ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

## ឆ្នាំគម្រប់ពីរ

ខ្សែ ៧



ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណើម៉ង្គ

គ្រិ. ឆ្នាំ ១៩២៧

ពុ. ស. ២៤៧០

អ្នកទទួលខុសត្រូវ ជុំ-ម៉ៅ

# បញ្ជីរឿង

ទំព័រ

# អំពីជើងទៀនស្ពា ១ មានក្បាច់ចម្លាក់រឿងរាមកេរ្តិ៍

អ៉ាដឺប្លូកាហៀល ការប៉ឺឡេស ជាបណ្ណារក្ស

ព្រះរាជបណ្ណាល័យកម្ពុជា អធិប្បាយ

ក្រុមការ ជុំ មៅ ប្រែមកជាភាសាខ្មែរ

---

## អំពីជើងទៀនស្ពា មានក្បាច់ចម្លាក់រឿងរាមកេរ្តិ៍

ក្នុងសៀវភៅខ្សែមុន ដែលយើងនិយាយអំពីថ្មមថ្ម ១ ដុំមានឆ្លាក់រឿងក្នុងព្រះពុទ្ធសាសនា គ្រង់ព្រះសព្វញ្ញុសម្ពុទ្ធបរិនិព្វានទ័ង រាមកេរ្តិ៍ គ្រង់ចម្លាំងតាល័ង្ក ទុកនោះ យើងបានធ្វើឲ្យឃើញអំពីរឿងក៏ក្នុងសាសនាព្រាហ្មណ៍ ចូលប្រឡុំក្នុងការគោរពព្រះពុទ្ធសាសនា ។

ឯជើងទៀនស្ពា ដែលយើងពណ៌នាក្នុងគ្រានេះ ធ្វើឲ្យយើងឃើញកស្តុតាង ១ ជាថ្មីទៀត ជើងទៀននេះ ក្តួលឆ្លាក្រៅ ក្នុងខេត្តសៀមរាប បាននាំមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ ពីក្នុងខែមករា ឆ្នាំ ១៩២៦ គេធ្វើដោយថ្ម កំកម្ពស់៣៤សង់ទីម៉ែត្រ ជើងទៀននេះមានចែកជា២ផ្នែក ៗ

ផ្នែកទី ១ គឺកមានកំពស់ ៥ សង់ទីម៉ែត្រ មានលកប្រហោងពីខាងក្នុង ៗ

ផ្នែកទី ២ គឺជាដែលមានចេទាដាក់រូបចម្លាក់ពាសពេញភាំងគស់ ៗ

ព្រោះនេះ គេធ្វើជាប្រយោជន៍ព្រះពុទ្ធសាសនា សម្រាប់ទីនតម្កល់នៃ

ទៀនវស្សា ដូចមានប្រហោងដែលលកនៅមាត់ សម្រាប់ដោតទៀនជាចំណាំស្រាប់ ។

ឯរូបចម្លាក់តាំងប៉ុន្មាននោះ កាលពីដើមមានលាបថ្នាំជាច្រើនពណ៌ផ្សេងៗគ្នា តាមដោយកន្លែងមានពណ៌បៃតង ក្រហម ខ្មៅ-លឿង ជាដើម ហើយពណ៌តាំងនោះនៅសម្គាល់បានដកបដល់សព្វថ្ងៃ ។

ឯរូបចម្លាក់តាំងប៉ុន្មាននេះសក្តិសមកងកាយគួរជាទីសង្កេតមើលដោយសេចក្តីសោមនស្សណាស់ វត្តនេះប្រហែលជាគេសាងតាំងពីក្នុង រវាងពុទ្ធសករាជ ២៣៥០–២៤០០ ម្ល៉េះ ។

ឯរឿងរ៉ាវដែលគេឆ្លាក់ជាប់នៅលើវត្តនោះ ជាការស្រណុកទឹងសម្គាល់ណាស់ ។

ជាដើម មានកងទ័ពពានរ ដែលកំពុងដក្លានដុំថ្មយកទៅធ្វើជាស្ពាន ហើយតមកទៀតឃើញត្រីសមុទ្រងើបក្បាលផុតពីទឹក ដើម្បីនាំយកដុំថ្ម ១ម្តងទៅប្រថនោះ ឃើញហនុមានកំពុងប្រចាប់នាង សុវណ្ណមច្ឆា កណ្តាលហ្វូងត្រីទាំងពួង តពីនោះទៅទៀតឃើញព្រះរាមនិងព្រះលក្ស្មណ៍ ប្រថាប់នៅក្នុងព្រះពន្លាមួយអន្ទើរដោយពិភេកជាហោក ភៀកក្តារឆ្នូតក្រោមភៀក បម្រុងនឹងគន់គូរទាយរកកន្លែងដែលពួកយក្សនៅ ។

ឯសេចក្តីដែលពុទ្ធសាសនា និងព្រាហ្មណសាសនាចូលប្រឡូកប្រឡំគ្នានោះមិនមែនតែក្នុងគ្រាឥឡូវនេះឡើយ នៅប្រជុំអង្គរយើងឃើញមានភស្តុតាងជាច្រើនណាស់ ក្នុងប្រាសាទបុរាណនីមួយៗ ។

វេលានេះយើងទាញយកប្រាសាទ ១ ដោយព្រាវមកនិយាយ ដូចយ៉ាងប្រាសាទព្រះខ័ន នៅទ្វារចូលខាងកើតនៃប្រាសាទនេះ ឃើញមានឆ្លាក់រឿងត្រង់កូរសមុទ្រទឹកដោះ រឿងនេះជារឿងដែលមានក្នុងមហាភារត និងរឿងរាមកេរ្តិ៍ គេឃើញទេវតា ១ ពួក និងអសុរ ១ ពួកចាប់នាគទាញសងខាងផ្លូវជាខាងមុខសសរ ដែលមានរឿងរ៉ាវខាងពុទ្ធសាសនា នៅលើជ្រុងសសរទាំង ៤ នោះ ឃើញឆ្លាក់ជាព្រះពុទ្ធរូបកំពុងចម្រើនមេត្តាភាវនា ហើយនៅក្នុងប្រាសាទដដែលនេះ គេឃើញមានសិលាចារឹក ២ យ៉ាងឆ្លាក់នៅប្របគ្នា ចារឹកម្យ៉ាងចំពោះដល់ព្រះសម្មាសម្ពុទ្ធ ចារឹកម្យ៉ាងទៀតចំពោះដល់ព្រះឥសូរ ។

សាសនាទាំង ២ នៅជាមួយគ្នា តែមិនបានចុះចូលគ្នាឡើយ គឺនៅមានឯកចិត្តតែរៀងខ្លួន គួរសម្គាល់ទុកជាប្រាកដហើយកុំឲ្យច្រឡំទៅវិញទៅមក ដូចយ៉ាងដែលបានប្រទះឃើញខ្លះក្នុងសព្វថ្ងៃនេះ ។



# អំពីព្រះនិរ្វាណ ឬ និព្វាន

របស់លោកកំមង់ដង់ រូបែរត៍

ជាងហ្វាងសាលាបារាំងសែស-ចិន នៅស្រុកចិក្វាង កូសាំងស៊ីន

ក្រុមការ ជុំ ម៉ៅ

ធ្វើរាជការនៅព្រះរាជបណ្ណាល័យកម្ពុជា ប្រែមកជាភាសាខ្មែរ

ក្នុងពុទ្ធសាសនា គោលចារឹកដែលពុទ្ធសាសនិកជន ជាអនេក សំដៅយកដោយធ្វើសីល ធ្វើទាន និងចំរើនភាវនា នោះគឺដើម្បីឲ្យបានជាតិកំណើតល្អទៅអនាគតកាល ឯចំណែកអ្នកបួស ដែលខំកសាងតាំងពីច្រើនជាតិមក សំដៅយកថ្នាក់ខ្ពស់ជាងនោះទៅទៀត គឺព្រះនិព្វាន ហើយក៏ខំប្រតិបត្តិតាមគោលចារឹក តាមផ្លូវដែលព្រះសម្មាសម្ពុទ្ធទ្រង់សម្តែងទុក អ្នកប្រាជ្ញម្នាក់ឈ្មោះ សំយកត្រូ បានចារឹកទុកថា ដែលចេញចាកវដ្តសង្សារ ទៅបំពេញផ្នួសជាបព្វជិតនោះ គឺគ្រាន់តែប្រាថ្នាឲ្យបានដល់ព្រះនិព្វាន ១ មុខប៉ុណ្ណោះ ៗ

ឯចំណែកខាងអ្នកដែលជាឃរាវាសនោះ ក៏មានប្រាថ្នាយកទីនេះដែរ ប៉ុន្តែទឹងមានជាតិណា ១ ទៅខាងមុខ នឹងចូលបំពេញផ្នួសចំរើនភាវនា យកថ្នាក់ខ្ពស់នេះ ៗ

គម្ពីរសំយុត្តនិកាយមានសម្តែងថា ក្នុងរូបបុគ្គលដែលរួចចាកទុក្ខ គឺ

បុគ្គលដែលបានច្បាស់នូវ អរិយសច្ច ទាំង ៤ ប្រការនោះ មានកើតប្រាជ្ញាជាគ្រឿងផុតទុក្ខ គឺគ្មានពូជធារនឹងកើតវិញ ព្រោះបានធ្វើបំពេញកិច្ចគ្រប់ស្ថាន ហើយគ្មានត្រឡប់មកក្នុងលោកនេះវិញទេ នេះហើយដែលហៅថាបេះ ។

គម្ពីរមហាវគ្គសម្តែងថា មានផ្លូវ ២ យ៉ាង ដែលអ្នកបួសត្រូវវៀសវាងចេញ ផ្លូវទី ១ គឺដែលបណ្តោយខ្លួនឲ្យលុះក្នុងអំណាចកាមគុណ ដែលហៅថា កាមសុលិកានុយោគ ផ្លូវនេះជាផ្លូវអាក្រក់គ្រោតគ្រាតហើយឥតប្រយោជន៍ ផ្លូវ ១ ទៀតគឺដែលធ្វើខ្លួនឲ្យនឿយឥតអំពើដែលហៅថា អត្តកិលមថានុយោគ ផ្លូវនេះជាផ្លូវពិបាក ហើយឥតប្រយោជន៍ តថាគតបានវៀសវាងលះបង់ផ្លូវទាំង ២ យ៉ាងនេះចោលចេញ ហើយដោយអំណាចលះបង់នេះ តថាគតបានរកឃើញផ្លូវកណ្តាល ដែលហៅថា មជ្ឈិបបដិបត្តិ ជាផ្លូវនាំទៅកាន់ពន្លឺ នាំទៅកាន់ប្រាជ្ញា ទៅកាន់ទីសុខ ទៅកាន់ទីបេះ នាំទៅកាន់ទីវិជ្ជាពិតប្រាកដ ទៅកាន់ព្រះនិព្វាន ។

គម្ពីរមជ្ឈិមនិកាយមានសម្តែងយ៉ាងលះ ហើយមានបែបផែនជាក់ជាងវាងលើទៅទៀត គឺថាដូច្នេះ ព្រះនិព្វាននោះជាកន្លែងដែលព្រះអរហន្តទាំងឡាយ លោករំលត់ជាតិលោក ព្រះនិព្វានជាគោលរបស់ព្រះអរហន្ត ព្រះនិព្វានជាទីបំផុតរបស់ព្រះអរហន្ត ។

ឯសេចក្តីទាំង ៣ បទ ដែលស្រង់យកបកពីគម្ពីរ ៣ ផ្សេងពីគ្នានេះ

ព្រមទាំងសេចក្ដីឯទៀតផ្សេង ៗ ដែលមានជាច្រើនធ្វើឲ្យឃើញថាគោលចារឹក ឬទីបំផុតរបស់ព្រះពុទ្ធសាសនា គឺសេចក្ដីឃើញច្បាស់នូវព្រះនិព្វាន ក្រៅពីនោះសុទ្ធតែជាកិច្ចដែលធ្វើដើម្បីឲ្យបានដល់ទៅទីនោះ ឯ អរិយ-មគ្គ ឬផ្លូវដ៏ប្រសើរនោះ ជាផ្លូវដែលនាំឲ្យគេឃើញ វិជ្ជាបំផុត គឺព្រះនិព្វាននេះឯង ។

ពិតមែនតែន័យផ្សេង ៗ ដែលសម្ដែងអំពី អដ្ឋង្គិកមគ្គ នោះ ស្រណុកនឹងយល់ដល់យើងកល់គ្នា ទោះជាតិក្នុងបច្ចិមប្រទេសក្ដី តែឯចំណែកព្រះនិព្វាននោះ មិនមែនយល់ងាយដូច្នោះឡើយ ។

តាមសេចក្ដីដែលសិក្សាមកឃើញថា ធម៌អាថ៌ទាំងឡាយក្នុងព្រះពុទ្ធសាសនាប្រហែលជាគ្មានគោលត្រង់ណាផ្សេងទៀត ដែលនាំឲ្យមានសេចក្ដីជជែកប្រកែកគ្នា ដូចត្រង់កន្លែងព្រះនិព្វាននេះឡើយ បានជាថាដូច្នេះព្រោះស្ថានត្រង់នេះ ជាគោលបំផុត សម្រេចរបស់អ្នកដែលសំដៅយក ហើយដើម្បីឲ្យបានព្រះនិព្វាននេះពុទ្ធបរិសទ្យបានតយុទ្ធមកជាច្រើនជាតិ ទីងគណនាគ្រាកប់មិនបាន ដូច្នេះយើងត្រូវចាំរកន័យផ្សេង ៗ ដែលព្រះគន្ថរចនាចារ្យទាំងឡាយ លោកបានចារឹកទុកក្នុងគម្ពីរនានា ដើម្បីនឹងបានជួយដល់យើងឲ្យកើតជាគំនិត ១ ឬ ជាសេចក្ដីយល់ឃើញ ១ ឡើង ប្រសិនបើជាយើងធ្វើបាននោះ ឃើញថាជាការស្រួលល្អណាស់ ។

ជាដំបូងយើងត្រូវនិយាយថា ពាក្យដែលថា និព្វាន មានតាំងពីមុនព្រះពុទ្ធសាសនាទៅទៀត ហើយក្នុងជាន់នោះ ពាក្យនេះមានន័យដូច្នេះ

ទៅហើយ គឺកំពូលសំណាងខ្ពស់បំផុត និងសេចក្តីរលត់ជាតិកំណើតក្នុង
លោកនេះ ។

គម្ពីរ សំយុត្តសុត្ត សម្តែងថា មានពុទ្ធបរិសទ្យជាច្រើនសួរ
ព្រះសារីបុត្តត្ថេរថា " និព្វាន, និព្វាននោះគេជាអ្វី " ព្រះសារីបុត្តត្ថេរ
តបវិញថា ដែលហៅថានិព្វាននោះ គឺជាសេចក្តីរលត់នូវ លោភ ទោ-
ស និង មោហ ។

យើងបានឃើញសេចក្តី ១ ក្នុងគម្ពីរធម្មបទ សម្តែងថាដូច្នេះ ៖
បើកាលណាកំចាត់បង់សង្ខារបានហើយ នឹងបានច្បាស់នូវព្រះ
និព្វាន ។

គម្ពីរ សុត្តនិបាត សម្តែងថា កន្លែងណាដែលគ្មានអ្វីសោះ ដែលគ្មាន
ជំពាក់អ្វីសោះ ដែលមិនមែនជាធម្មតា កន្លែងនោះហើយដែលហៅនិព្វាន
ដែលហៅថាផុតចាស់ ផុតស្លាប់ សេចក្តីទាំងប៉ុន្មាននេះនាំឲ្យយើងយល់
ថានិព្វាននេះបានដោយមនុស្សម្នាក់កំចាត់បង់នូវ លោភ ទោស និង
សង្ខារ គឺសេចក្តីតាក់តែងព្រមទាំងអំពើដែលធ្វើមកពីជាតិមុនៗ ចេញ ។

គម្ពីរធម្មបទ សម្តែងថាដូច្នេះ៖ អ្នកឯណាដែលរត់រួចផុតអំពីវដ្ត-
សង្សារ អ្នកឯណាដែលបានឆ្លងកុតទៅត្រើយនាយ ហើយបានឡើងលើ
ច្រាំង គឺដែលបានសំឡឹងពិចារណាច្រើន មិនដុនជាបខ្សាបខ្សាយ
ឥតសេចក្តីលោភៈ អ្នកឯណាដែលបានលះបង់វត្ថុដែលអាស្រ័យនៅលើដី

ទោល ហើយបានដល់នូវព្រះនិព្វានអ្នកនោះហើយគឺថាគេហៅថាជាព្រាហ្មណ៍ពិត ៗ

គម្ពីរ សុត្តនិបាត សម្តែងថាដូច្នេះ ៖ ក្នុងលោកនេះដែលបានឃើញ បានឮ បានគិត ជាច្រើនរាប់មិនអស់ ឯកិរិយាដែលកំចាត់បង់នូវសេចក្តីប្រាថ្នាក្នុងវត្ថុដែលប៉ះពាល់ដល់នោះហើយ ជាអមតនិព្វាន អ្នកឯណាដែលបានយល់ច្បាស់សេចក្តីទាំងនេះ អ្នកនោះឯងជាមនុស្សមានគំនិត ជាមនុស្សមិនប្រឡាតដោយលោកធម៌ឡើយ ព្រោះបានឃើញធម៌ច្បាស់ប្រាកដណាស់ អ្នកឯណាដែលបានរួចចាកពីសេចក្តីប្រាថ្នាក្នុងលោក អ្នកនោះបានសេចក្តីរីករាយសុខសាន្ត ៗ

គម្ពីរ អគ្គាវេជ្ជយស្សុត្ត មានសម្តែងថា ៖ ពេញខ្លួនបរិបូណ៌ ១ ដែលបានកាត់បំបាក់នូវកាមគុណអស់ហើយ បានកាត់បំបាក់នូវសេចក្តីជឿខុសថា របស់ទាំងឡាយក្នុងលោកនេះទៀង បានហើយ បានបំបាក់នូវសេចក្តីល្ងង់ហើយ ៗ មានសេចក្តីប្រាថ្នាឲ្យបានស្គាល់ ឲ្យបានដល់បែបផែននៃអរហត្ត ឬឲ្យបានដល់សេចក្តីរំងាប់នៃគំនិត នោះត្រូវឲ្យតាំងនៅក្នុងសេចក្តីត្រេកដោយពេញចិត្ត ត្រូវឲ្យស្ងួតត្រង់នូវសេចក្តីស្ងប់ស្ងាត់របស់ចិត្តដែលភ្លឺមកពីខាងក្នុង ត្រូវឲ្យពិចារណាមើលរបស់ទាំងឡាយត្រូវឲ្យនៅស្ងាត់តែម្នាក់ឯង ៗ

យើងត្រូវបន្ថែមសេចក្តីទាំង ៦ ខាងក្រោមនេះទៀត ដែលបានសម្តែងក្នុងគម្ពីរអភិធម្មកោសៈ សេចក្តីទី ១ មានសម្តែងថាសេចក្តីលះ

បង់ជាប្រឡះ សេចក្តីដែលបរិសុទ្ធ សេចក្តីដែលស្ងិតស្រពោន សេច-ក្តីដែលស្ងប់ស្ងាត់ សេចក្តីដែលកំចាត់បំបាត់បង់ សេចក្តីដែលរលាយរលត់ សេចក្តីដែលផុតចាកទុក្ខទាំងអស់ជាប្រឡះ សេចក្តីដែលមិនកើតទៀត សេចក្តីដែលមិនលុះអំណាចតណ្ហា សេចក្តីដែលទុក្ខមិនបង្កើតឡើងទៀត នោះហើយជាសេចក្តីស្ងិតស្រពោន សេចក្តីដ៏ឧត្តមដែលត្រូវដឹងថាសេចក្តីលះបង់ចោលនូវឧបាទិចេញ ជាសេចក្តីរំងាប់នូវតណ្ហា ជាសេចក្តីស្ងប់ស្ងាត់ ជាសេចក្តីបំបាក់បំបាត់បង់, ជាព្រះនិព្វាន ។

សេចក្តី ១ ទៀតសម្តែងថាដូច្នេះ សច្ចទី ៣ ឬ ព្រះនិព្វាននោះ គឺជាសេចក្តីបំបាត់បង់នូវទុក្ខនេះឯង ដែលត្រូវយល់ថាជាសេចក្តីកំចាត់បង់នូវតណ្ហា សេចក្តីដែលធ្វើនូវតណ្ហាឲ្យស្ងប់ស្ងាត់ សេចក្តីដែលបោះបង់ចោលនូវតណ្ហា សេចក្តីដែលរួចខ្លួនពីតណ្ហា ។

ន័យក្នុងគម្ពីរទាំងប៉ុន្មាន ដូចបានពោលមកខាងលើនេះ ពិតមែនតែមានបែបតែម្យ៉ាង ប៉ុន្តែបានសេចក្តីផ្សេងពីគ្នាខ្លះ ដែលយើងត្រូវតែចាំក្នុងវេលានេះ គឺន័យខ្លះថាដូច្នេះ សេចក្តីលត់នូវ លោភ ទោស និង មោហៈ ហើយសេចក្តី ១ ទៀត និយាយពីផុតពូជមិនកើតទៀត មានន័យ ២ ដែលសម្តែងថាព្រះនិព្វាន នោះគេអាចនឹងបានតាំងពីកាលមានរូបរស់នៅ ន័យ១ទៀតថា អ្នកឯណាដែលបានដល់ព្រះនិព្វាននោះ ជាអ្នកបរិបូណ៌ដោយសេចក្តីសុខដ៏ច្រើន ហើយឯគម្ពីរសុត្តនិបាត សម្តែងថាអ្នកឯណាដែលបានដល់ព្រះនិព្វាននោះជាមនុស្សពិចារណាច្រើនហើយ

សូត្រ ហើយខាងក្រោយនេះគាថាទី ១ សម្តែងថា អ្នកឯណាដែលបានដល់ព្រះនិព្វាននោះបានស្គាល់នូវសេចក្តីដែលផុតចាកទុក្ខ ។

តាមដែលបានសង្កេតពិនិត្យមើលសេចក្តីទាំងប៉ុន្មានដូចបានពោលមកខាងលើ មិនឃើញមានន័យណា ១ សម្តែងអំពីព្រះនិព្វាន ថាជាសូន្យទទេ ថាជាផុតអ្វីៗទាំងអស់ដូចយ៉ាងអ្នកដែលកាន់ពុទ្ធសាសនាគៈណខ្លះនិងជាតិយុរ៉ុបខ្លះ ដែលគេធ្លាប់ជឿមកដល់សព្វថ្ងៃនេះឡើយ ។

គម្ពីរ សំយុត្តនិកាយ បានសម្តែងដោយច្បាស់ប្រាកដ អំពីយមកភិក្ខុដែលមានចិត្តវេរវាយ ដោយយល់ថាភិក្ខុ១ អង្គដែលគ្មានប្រព្រឹត្តល្មើសអ្វីសោះ វេលាដែលបានទម្លាយខន្ធទៅ នោះរលត់ទាំងអស់ គឺគ្មាននៅសល់អ្វីជាក្រោយដែលស្លាប់ ហើយវេលានោះព្រះសារីបុត្ត បានកែតម្រង់យមកភិក្ខុពីគំនិតខុសនោះបានឡើងវិញ ។

មាននិទាន ១ សម្តែងអំពីពុទ្ធបរិស័ទ ១ អង្គនោះ ឈ្មោះថាទ័ពដែលបានហោះទៅកណ្តាលអាកាសពីចិត្តឯង នៅចំពោះមុខព្រះសម្មាសម្ពុទ្ធ ហើយចូលនិព្វានក្នុងវេលានោះ ឥតមានសល់អ្វីជារាងកាយបន្តិចសោះ ហើយព្រះពុទ្ធអង្គមានបន្ទូលថា ឯអណ្តាតភ្លើងដែលថយបន្តិចបន្តួច ៗហើយរលត់ទៅ គេមិនអាចនឹងដឹងថាអណ្តាតភ្លើងនោះទៅឯណា មានប្រការដូចម្តេចមិញ ឯព្រះអរហន្តដែលលោករួចខ្លួនស្រឡះពីវដ្តសង្សារ ដែលលោកបានផ្តាច់កាត់នូវសេចក្តីប្រាថ្នា ហើយដែលលោកបានដល់ទីសុខឥតប្រែប្រួល នោះវេលាដែលលោកទំលាយខន្ធទៅ គេក៏មិនអាចនឹងដឹងបាន

មានប្រការដូច្នោះឯង សេចក្តីត្រង់នេះមានអ្នកប្រាជ្ញជាតិបារាំងសែសម្នាក់ ឈ្មោះ ល្វីដឺឡាវ៉ាលេពូស្សំង់ កត់សម្គាល់ថា ឧទាននេះនិយាយច្បាស់ប្រាកដណាស់ គឺកើតក៏មិនសូន្យ ព្រះអរហន្ត ក៏មិនសូន្យ ឯព្រះអរហន្តដែលលោកបានដល់នូវព្រះនិព្វាននោះ មិនមែនជាមនុស្សមានជីវិត មិនមែនជាអត្តភាព មិនមែនជារូបសោយអារម្មណ៍ មិនមែនជារូបដែលមានចិត្តគ្រប់ទៅ ដូចកាលពីដើមនោះឡើយ ។

គម្ពីរនេត្តិប្បករណ មានសម្តែងសេចក្តីពីរបទ ដូចមានខាងក្រោយ បទទី ១សម្តែងថាដូច្នេះ អ្នកឯណាដែលគិតថាគេអាចនឹងចេញពីជាតិដោយឥតជាតិបាន អ្នកនោះឯងមិនរបូតរួចពីជាតិឡើយ ។

បទ ១ ទៀតសម្តែងថាដូច្នេះ ព្រះអរហន្ត ដែលលោកបានដល់ព្រះនិព្វាននោះជ្រៅពន់ប្រមាណណាស់ មិនអាចនឹងរាប់ មិនអាចនឹងគណនា លោកថាដែលបានដល់នូវព្រះនិព្វាននោះ គឺព្រោះសេចក្តីប្រាថ្នា សេចក្តីស្អប់ខ្ពើមគុំគួននិងសេចក្តីល្ងង់នោះកំចាត់បំបាត់បានអស់ហើយ ។

ក្នុងបទទី ១ នោះ យើងឃើញសេចក្តីថា គេមិនអាចនឹងចេញផុតពីជាតិដោយសូន្យទទេឡើយព្រោះសេចក្តីដែលថាឥតជាតិនោះ គឺសូន្យទទេនោះឯង ហើយក្នុងបទទី ២ សម្តែងគឺពីសេចក្តីកំចាត់បំបាត់ ប៉ុន្តែកំចាត់បំបាត់នោះ គឺកំចាត់បំបាត់នូវសេចក្តីប្រាថ្នា នូវសេចក្តីស្អប់ខ្ពើមគុំគួន នូវសេចក្តីល្ងង់មិនមែនជាកំចាត់បំបាត់រូបទាំងអស់ឡើយ ។

ចំណែកខាងជាតិដែលនៅក្នុងបច្ចិមប្រទេស ដែលយល់ថាព្រះនិព្វាន ជាទទេសូន្យនោះ គឺមិនបានព្យាយាមរិះរកន័យឲ្យបានជ្រៅទូលាយ ហើយ ចំណែកខាងជាតិក្នុងបូព៌ាប្រទេសវិញ ពាក្យទទេសូន្យនេះគ្មានទាក់ទិនទៅ លើសេចក្ដីអ្វី ១ សោះ អ្វីៗ មិនដែលមកពីទទេ ហើយមិនដែលត្រឡប់ ទៅរកទទេវិញឡើយ ជាក្រោយសេចក្ដីមរណៈ ដែលជាធម្មតារបស់សត្វ នោះធាតុផ្សេងៗ ដែលផ្សំផ្គុំគ្នាបានជារូបសត្វ បែកធ្លាយរលាយរលែក ចាកគ្នា ចេញតាមភាពសណ្ឋានទីទៃពីគ្នា សេចក្ដីនេះឃើញច្បាស់ណាស់ គ្មានអ្វីឲ្យច្បាស់ជាងនេះទៅទៀតឡើយ ប៉ុន្តែក្នុងធាតុនីមួយៗ ទាំងនេះ ឬ ក្នុងអនុធាតុទាំងឡាយរបស់ធាតុទាំងនេះ ឥតមានធាតុណា ១ សោះសូន្យ ឡើយគឺនឹងទៅប្រជុំផ្គុំគ្នាជាថ្មីកកើតជារូបខន្ធបណ្ដោះអាសន្នទៀតទៅខាង មុខ តាមសេចក្ដីទាំងប៉ុន្មានដែលបានពណ៌នា រៀបរាប់មកខាងលើនេះ ឃើញថាតាមដោយយោបល់របស់ព្រះសម្មាសម្ពុទ្ធនោះ ព្រះនិព្វានហាក់ ដូចជាមិនមែនរលត់សោះសូន្យជាស្រឡះឡើយ ។

សេចក្ដីដែលអធិប្បាយមកទាំងប៉ុន្មាន ដែលទើប[illegible]អធិប្បាយហើយ អម្បាញ់មិញនេះ គឺនិយាយតែពីព្រះនិព្វានដែលនៅក្នុងលោក ឬ ដែល ពាក្យបាលីហៅថា សឧបាទិសេសនិព្វាន នោះ គម្ពីរ ឥតិវុត្តកៈ អធិប្បាយថា សេចក្ដីទាំងប៉ុន្មានដែលព្រះសម្មាសម្ពុទ្ធបានសំដែងនោះពិត ប្រាកដណាស់ ពុទ្ធបរិស័ទឯណាដែលបានរលាស់ខ្លួន ឲ្យរួចចាកផុតពី សេចក្ដីជំពាក់ក្នុងលោក ផុតពីសេចក្ដីរង្វើង ដោយអំណាចបានចម្រើន

មេត្តាភាវនា ដោយអំណាចបានហាត់ហ្វឹកហ្វឺនចិត្ត ហើយបានដល់នូវព្រះ
អរហត្ត ដោយអំណាចផលបុណ្យជាឧបនិស្ស័យពីជាតិមុន ៗ មក នោះ
បានដល់ទីដែលមានភាពសណ្ដាន ស្មើរតែមិនមែនធម្មតារបស់លោកខាង
អាយនេះ តាំងពីមុនទម្លាយខន្ធទៅម៉្លេះ ហើយក្នុងវេលាដែលបានដល់ទី
នេះ ពុទ្ធបរិស័ទនោះ ក៏អាចនឹងស្គាល់នូវសព្រះនិព្វានបាន ពុទ្ធបរិស័ទ
ឯណាដែលបានដល់ទីនេះហើយ បាននាមថាជាព្រះអរហន្តវិសេស ពិត
តែមានរូបនៅរស់មែន តែឯចិត្តនោះនៅដដែល ដូចគ្នានឹងចិត្តដែលមាន
ខន្ធធ្លាយទៅ ព្រះអរហន្តលោកមានរូបរស់នៅតទៅ ដូចជាបុថុជ្ជនធម្មតា
ដែរ ខ្លួនលោកក៏ត្រូវការប្រាស្រ័យនឹងអាហារ ហើយដោយអំណាច
អាហារនេះក៏ធាតុផ្សេង ៗ ដូចយ៉ាង គំនិត កម្លាំង ប្រាជ្ញា ស្មារតី ក៏គង់
នៅមានជានិច្ច តាំងវេទនា សញ្ញា សង្ខារ ក៏នៅប្រព្រឹត្តទៅតាមមុខ
ក្រសួងតែរៀងខ្លួន ឯសង្ខារខន្ធគង់នៅតាំងវិញ្ញាណខន្ធក៏គង់នៅដែរ ប៉ុន្តែ
វិញ្ញាណបរិសុទ្ធណាស់ ព្រោះសេចក្ដីវង្វេង សេចក្ដីប្រាថ្នា សេចក្ដីដែល
ជាប់ជំពាក់នឹងកាម សេចក្ដីស្អប់ខ្ពើមគុំគួន នោះបានកំចាត់បោះបង់ចោល
ជាស្រឡះ ដោយអំណាចសេចក្ដីព្យាយាមពីជាតិមុន ៗ មក និងដោយ
អំណាចសេចក្ដីចម្រើន មេត្តាភាវនាក្នុងជាតិនេះ កាលណាព្រះអរហន្ត
លោកទម្លាយខន្ធទៅនោះ ឥតមានប្រែប្រួលភាពអ្វីសណ្ដានឡើយ ព្រោះ
កាលដែលរូបលោកនៅរស់នោះ លោកបានដល់ទៅមាត់ទ្វារព្រះនិព្វាន
ទៅហើយ ៗ

សេចក្តីប្លែកគ្នាត្រង់ដែលព្រះអរហន្ត លោកចេញពីនិព្វាន មានរូប ចូលក្នុងនិព្វានឥតរូប នោះដូចមានសេចក្តីដែលទឹងពណនាទៅទេះ គឺនិព្វានដែលបានក្នុងកាលរូបរស់នៅនោះ ព្រះអរហន្តលោកនៅមានធាតុផ្សេងៗ ដែលមានរូប ឬឥតរូបដែលផ្សំគ្នាឡើងជាអត្តភាព របស់មនុស្សនៅឡើយ គឺស្ថានត្រង់នេះហើយដែលយើងហៅថានិព្វាន មានឧបាទិ ឬថា សឧបាទិសេសនិព្វាន គឺថាមានខន្ធទាំងអស់គង់នៅដូចយ៉ាង រូបក្ខន្ធ វេទនាខន្ធ សញ្ញាខន្ធ សំខារ និង វិញ្ញាណខន្ធ លុះវេលាដែលសេចក្តីមរណៈមកដល់ក៏ ឧបាទិទាំងប៉ុន្មាន ដែលគង់នៅ លោយប្រុសបាកគ្នាទីទៃចេញ លែងប្រមូលផ្តុំគ្នាជាថ្មីទៀតហើយ ព្រះអរហន្តក៏ចូលទៅក្នុងនិព្វានដែលគ្មានឧបាទិ ឬអនុបាទិសេស-និព្វាន គេអាចទឹងថាដូច្នេះបាន ឯសេចក្តីដែលលះបង់នូវ លោភ ទោស មោហាចេញនោះជាទី អរហន្ត ឬជានិព្វានមានហើយសេចក្តីដែលផុតទុក្ខផុតជាតិកំណើតនោះ ជាទីព្រះនិព្វានគ្មាន ឧបាទិ ។

គម្ពីរ ទីឃ និកាយ សម្តែងថាដូច្នេះ រូបអង្គតថាគតនូវប្រព្រឹត្តទៅជាធម្មតាពិតមែនតែសេចក្តីប្រាថ្នាក្នុងកពថ្មីនោះ បានកាច់បំបាក់ចោលជាស្រឡះ រូបអង្គតថាគតនៅប្រព្រឹត្តទៅដរាបណា មនុស្សនិងទេវតាទាំងឡាយក៏នៅឃើញតថាគត ដរាបនោះ វេលាណាតែរូបអង្គតថាគតប្រែក្លាយទៅហើយទាំងមនុស្ស ទាំងទេវតា លែងបានឃើញសោះ ។

មុននឹងយោបល់បញ្ចប់សេចក្តីនោះ យើងត្រូវសាត្រឡប់មកនិយាយអំពីនិព្វាន ដែលបានតាំងពីកាលបូរស់នៅជាមុននិព្វាននេះវិញ គឺថា ក្នុងនិព្វានដែលសល់នូវខន្ធនេះ ព្រះអរហន្ត លោកសោយសុខក្នុងព្រះនិព្វានដែលលោកបានដល់នោះ ប៉ុន្តែគឺសោយតែពេលដែលលោកកំពុងធ្វើឈានប៉ុណ្ណោះទេ នៅវេលាដែលលោក ចេញពីឈានសមាបត្តិមកវិញនោះ លោកក៏នៅចាំភាំងអស់ អំពីដែលលោកបានប្រទះឃើញក្នុងវេលាកំពុងធ្វើឈាន ប៉ុន្តែឯសេចក្តីដែលប្រទះឃើញ ឬដែលបានប៉ះពាល់ទាំងប៉ុន្មាននោះ នឹងយកមកប្រែស្រាយជាភាសាសម្រាប់មនុស្សថាដូច្នេះដូច្នោះមិនកើត ព្រោះគ្មានពាក្យសម្រាប់មនុស្សលោកនឹងថាឲ្យចំ ៗ មានពាក្យបុច្ឆាក្នុងគម្ពីរ ទិដ្ឋធម្មនិព្វាន ថា ដើម្បីនឹងឲ្យបានដល់និព្វាននោះ តើត្រូវធ្វើដូចម្តេច វិសជ្ជនា ថា ដើម្បីឲ្យបានព្រះនិព្វាននោះត្រូវចម្រើនរូបឈាន ៤ និងអរូបឈាន ៤ ដែលហៅថា សមាបត្តិទាំង ៨ ប្រការ និង ឈានថ្នាក់បំផុត ១ ទៀតដែលហៅថា សញ្ញាវេទយិតនិរោធ ហើយដែលជាឈានផ្ទាល់នឹងតួព្រះនិព្វាន កាលដែលបានធ្វើឈានទាំងប៉ុន្មាននេះហើយ អ្នកដែលធ្វើឈានក៏បានដល់នូវព្រះអរហត្ត ហើយក៏បានទីជាព្រះអរហន្ត ក្នុងវេលានោះ ៗ

ឯឈានទាំងប៉ុន្មាននេះ ប្រៀបដូចជាសេចក្តីហាត់តម្រង់នូវសន្ទុះ ឬកម្លាំងចិត្តរបស់មនុស្ស ឯកម្លាំងសន្ទុះរបស់ចិត្តនោះ អាចនឹងក្លាយឡើង

បាន ឬ នឹងថយទៅវិញបាន តាមដោយព្យាយាមហាត់ឬ ដោយធ្វេសបោះបង់ចោល មានគណនាដូចជាគេហាត់ យកកម្លាំងពលំធម្មតារបស់ខ្លួនមនុស្សដោយក្បួនខ្នាតជាបែបហាត់ដូច្នោះដែរគឺថាបើព្យាយាមហាត់រាល់ ៗ ថ្ងៃទៅនោះនឹងមានកម្លាំងពលំច្រើនឡើង ហើយបើធ្វេសបោះបង់ចោលទៅវិញនោះកម្លាំងក៏ធុនថយទៅវិញ ។

ក្នុងមហាអស្សបុរសុត្ត មានសម្តែងអំពីឈានទាំង ៤ ថ្នាក់ ខាងដើម គឺព្រះសម្មាសម្ពុទ្ធ ទ្រង់សម្តែងប្រាប់ព្រះមហាអានន្ទថា ដូច្នេះ ដើម្បីនឹងឲ្យបានដល់បឋមជ្ឈាន ឬ ឈានថ្នាក់ទី ១ នោះត្រូវតាំងសមាធិ លះបង់នូវចិត្តអាក្រក់ គឺ និវរណា ទាំង ៥ ចោលទាំងអស់ ហើយចម្រើននូវ សញ្ញាសតិ គឺសេចក្តីរលឹកដ៏ប្រពៃ ឬ គំនិតត្រង់ដូចមានសម្តែងក្នុង អដ្ឋង្គិកមគ្គ ឬផ្លូវដែលមានមែក ៨ នោះឯង ធ្វើដូច្នេះហើយនឹងបានដល់នូវបឋមជ្ឈាន គឺជាសេចក្តីស្រួលកាយស្រួលចិត្តឬ សុខ និង សេចក្តីឆ្អែតកាយ ឆ្អែតចិត្ត ឬ បីតិដែលកើតឡើងដោយបានតាំងចិត្តក្នុងអារម្មណ៍តែ ១ ឬ ឯកគ្គតា ហើយនិងសេចក្តីរំពឹង ឬ វិតក្ក និងសេចក្តីដែលញុំាងឲ្យនៅជាប់ក្នុងអារម្មណ៍ ឬ វិចារ ។

ចម្រើនពីនេះទៅទៀតដោយលះបង់នូវសេចក្តីរំពឹង ( វិតក្កា ) និង សេចក្តីដែលញុំាងចិត្តឲ្យនៅក្នុងអារម្មណ៍ (វិចារ) ចេញ នោះនឹងបានដល់ទៅ ទុតិយជ្ឈាន គឺជាសេចក្តីស្រួលកាយស្រួលចិត្ត (សុខ)និងសេចក្តី

ឆ្អែតកាយឆ្អែតចិត្ត (បីតិ) ដែលកើតឡើងដោយសេចក្តីក្វិច្បាស់ គឺជាសេចក្តីមូលអារម្មណ៍និងសេចក្តីដែលមានចិត្តរីកឡើងឬស្ទុះខ្ពស់ឡើង ។

លះបង់នូវសេចក្តីត្រេកត្អរបីតិ ឬសេចក្តីឆ្អែតកាយឆ្អែតចិត្តនេះចេញ ព្រះយោគាវចរក៏តាំងនៅក្នុងសេចក្តីព្រងើយកន្តើយសោយអារម្មណ៍ជាសុខធ្វើជាម្ចាស់ចិត្តបាន ហើយក៏ដល់ទៅថ្នាក់ឈានទី ៣ ឬ តតិយជ្ឈាន គឺជាសេចក្តីដែលពេញចិត្តរីករាយឥតរង្គៀស ។

លុះវៀរចាកនូវសេចក្តីស្រួលចិត្តគឺសុខចេញ ហើយលះបង់នូវសេចក្តីឈឺចាប់គឺទុក្ខពោល មិនត្រេកអរនឹងសុខ មិនទោមនស្សនឹងទុក្ខ នោះព្រះយោគាវចរក៏បានដល់ទៅឈានថ្នាក់ទី ៤ ឬ ចតុត្ថជ្ឈាន គឺជាសេចក្តីដែលឈ្នះចិត្តឬជាម្ចាស់ចិត្តរបស់ខ្លួនដោយពិតប្រាកដ និងជាសេចក្តីដែលភ្លឺច្បាស់ពិតប្រាកដ ។

អារម្មណ៍ទាំងប៉ុន្មាន ដែលជាប់ជូនទៅជាមួយនឹងឈានទាំង ៤ ថ្នាក់ខាងដើមដែលព្រះយោគាវចរបានបម្រើនោះ បានឈ្មោះហៅថា អារម្មណ៍ ៤ គ្មានទីបំផុត ឬ អប្បមាណារម្មណ៍ អារម្មណ៍ទាំងនេះជាឥស្សរភាព ក្នុងកិរិយាប្រព្រឹត្តទៅជាប្រក្រតីរបស់ព្រះយោគាវចរដែលទៅកាន់ព្រះនិព្វាន ។

ឯសម្មាសមាធិ ឬការតាំងប្រពៃនោះ គឺមែកទី ៨ នៃ អដ្ឋង្គិកមគ្គ ឬផ្លូវដែលបែកមែក ៨ នោះឯង ។

ឯថ្នាក់ឈានដែលគាំទេះទៅទៀតនោះ នាំព្រះយោគាវចរដែលធ្វើ

ឈានឲ្យបានដល់ទៅអរូបភព ឈានទោះត្រូវចម្រើននូវអាកាសទទេមិនចេះផុតគឺអាកាសានញ្ចាយតនៈ ចិត្តមិនចេះផុតគឺវិញ្ញាណញ្ចាយតនៈ និងសេចក្តីដែលមិនមាននៅសល់អ្វីទាំងអស់ គឺអកិញ្ចញ្ញាយតនៈ ដើម្បីនឹងបានដល់ទៅសភាពដែលមានវិញ្ញាណជាកណ្តាលនៃសេចក្តីកត់សម្គាល់ដែលហៅថា នេវសញ្ញានាសញ្ញាយតនៈ ឯថ្នាក់ចុងបំផុតនោះគឺសមាធិបំបាត់នូវសញ្ញានិងវេទនា គឺថារំលត់នូវសេចក្តីដែលដឹង ក្នុងវេលានោះហើយដែលព្រះយោគាវចរបានដល់នូវព្រះអរហត្ត គឺបានសម្រេចនូវព្រះនិព្វាន ។

ត្រូវតែសម្គាល់ថាឯកិរិយា ដែលហាត់ធ្វើឈានថ្នាក់ដំបូងទាំងប៉ុន្មាននោះ មិនមែនជាហាត់បានហើយ នាំឲ្យបានឈានថ្នាក់បំផុតទាំងប៉ុន្មាននោះទៀតឡើយ គម្ពីរព្រះអភិធម្ម មានសម្តែងដោយជាក់ច្បាស់ណាស់អំពីរឿងនេះ គឺថាកិរិយាដែលនឹងធ្វើឈានទាំងប៉ុន្មានខាងក្រោយនោះ មានតែអ្នកបួសប៉ុណ្ណោះទើបអាចនឹងធ្វើបាន ឯជនដែលជាឃរាវាស ព្រោះបើបានហាត់ធ្វើឈានថ្នាក់ខាងដើមទាំងប៉ុន្មានឲ្យស្ទាត់ដូចម្តេចក្តី ក៏គង់តែនឹងចម្រើននូវ អាកាសានញ្ចាយតនៈ ឬវិញ្ញាណញ្ចាយតនៈ ។ល។ មិនបាន ។

គួរយើងចាំទុកថា ឯព្រះអរហន្តដែលចូលឈាននោះ មិនមែនជាកិរិយាដែលខ្លួនទៅនឹងស្លូកស្លត់វិញ្ញាណ ឥតស្មារតី ដូចយ៉ាង ដែលអ្នក

តែងសៀវភៅរឿងពុទ្ធសាសនាជាតិយូរ៉ុប គេធ្លាប់ជឿមៗនោះឡើយ ព្រោះគម្ពីរព្រះអភិធម្មមានសម្ដែងថា ព្រះអរហន្តមានញាណយ៉ាងខ្ពស់ ១ ដោយអំណាចកិរិយាដែលបានឃើញច្បាស់ឥតទើសទាល់ ដែលហៅថា វិបស្សនាញាណ នោះឯង ។

គម្ពីរ ជក្រាតិលោកា មានសម្ដែងថា អ្នកឯណាដែលបានលះបង់នូវ និវរណធម៌ ភោលបាន ឈ្មោះថាជាត្រិះរិះដ៏ប្រពៃ ។

ឯសេចក្ដីដែលឈ្នះនូវចិត្តដោយដាច់ខាត សេចក្ដីដែលបានសម្រេចព្រះអរហត្ត នោះហើយជាគោលបំផុតរបស់ឈាន ។

សេចក្ដីត្រង់នេះមានពាក្យចោទនេះថា ភោះដាម៉ិនមែនរកមិនឃើញ ក៏លំបាកនឹងឆ្លើយឲ្យចំ ដូចជាពាក្យដែលថានិព្វាននោះដែរ ប៉ុន្តែសេចក្ដីវិសជ្ជនាក្នុងស្ថាននេះ នាំឲ្យឃើញផ្លូវជាក់ច្បាស់ទៅក្នុងនិព្វាន ឯពាក្យចោទនោះថាដូច្នេះ អ្វីដែលចូលនិព្វានទៅវេលាក្រោយដែលទម្លាយខន្ធទៅ ។

សេចក្ដីត្រង់នេះយើងមិនអាចនឹងហ៊ានថា យើងឆ្លើយត្រូវឡើយដោយហេតុសេចក្ដីនេះ មានពាក្យដដែកមិនដាច់ស្រេច តាំងអំពីកើតព្រះពុទ្ធសាសនាម៉្លេះ មានសេចក្ដីងឿងឆ្ងល់នោះក៏ច្រើន ហើយមានសេចក្ដីដែលគេបានវិនិច្ឆ័យក៏ច្រើន ឯចំណែកយើងនោះ យើងគ្រាន់តែយកសេចក្ដីវិនិច្ឆ័យទាំងនោះខ្លះមកធៀបគ្នា ហើយស្រង់យកសេចក្ដីផ្សេង ៗ ដោយអាងដល់គម្ពីរខ្លះដែលត្រឹមត្រូវនោះ ឯចំណែកអ្នកទាំងឡាយពល់គ្នាមានឯកចិត្តរៀងខ្លួននឹងជឿថាដូចម្ដេច ៗ ហើយនឹងបង្កើតជាគំនិតថ្មី ១ បាន

តាមដែលខ្លួនយល់ឃើញថាគួរ ៗ

ជំនុំធាតុទាំងឡាយផ្សេង ៗ ដែលជានាមធម៌ដែលគេបានជឿមកថា មានដោយពិតនិងសេចក្ដីដែលផ្ទេរជាតិឬផ្លាស់ជាតិ ពី ១ ជាតិទៅ ១ ជាតិទៀត ព្រមទាំងផ្លូវដែលចូលទៅនិព្វាន គឺជាធាតុដែលរស់នៅជាក្រោយដែលស្លាប់នោះ ជាធាតុដដែល ដែលមានតាំងអំពីដើមរៀងមក នោះមានឈ្មោះដូចមានខាងក្រោយនេះ គឺ ៖

ពាក្យថា " អាត្ម័ន " ខ្មែរធ្លាប់ហៅ អាត្មា នោះដួនកាលគេប្រែហៅព្រលឹង ប៉ុន្តែក្នុងវេលានេះ យើងយកសព្ទដែលសម្រាប់ប្រើក្នុងសាសនាដូចយ៉ាងដែលគេធ្លាប់ប្រើក្នុងប្រទេសយូរ៉ុបនោះមកនិយាយ ៗ

គម្ពីរក្នុងពុទ្ធសាសនាមិនទទួលស្គាល់ ឬមិនជឿថាមានអាត្ម័នឡើយ ត្រង់នេះមានបុច្ឆាថា ចុះហេតុអ្វីបានជាព្រះសព្វញ្ញុពុទ្ធមិនព្រមទទួលឆ្លើយអំពីដែលថាលោកទៀង ឬមិនទៀង ឬ ១ ក៏គេសម្គាល់ថាលោកនោះហើយជាអាត្ម័ន ឬជាខ្លួនប្រាណ ប្រសិនបើជាដូច្នេះនោះបើជាគ្មានអាត្ម័ន យើងមិនបាច់និយាយអំពីលោកនោះដែរ គឺថាលោកនោះក៏គ្មានដូចគ្នា ៗ

ពាក្យថាវិញ្ញាណដែលគេតែងប្រែថាសេចក្ដីដឹង ឬប្រាជ្ញានោះតាមដោយគម្ពីរផ្សេង ៗ ក្នុងពុទ្ធសាសនាថាវិញ្ញាណនោះហើយ ជាអគ្គនាយកនៃកិរិយាផ្លាស់ជាតិ ១ ទៅជាតិ ១ [សំយុត្តនិកាយ] ក្នុង ១ ជាតិៗ របស់មនុស្សនោះ វិញ្ញាណនេះឯងជាខន្ធ ១ ដោយមានធាតុឯទៀតផ្សេង ៗ ចូលផង គឺរូបក្ខន្ធ វេទនាខន្ធ សញ្ញាខន្ធ

សង្ខារខន្ធ ដែលធ្វើឲ្យយើងកាន់ប្រឡំថាមានខ្លួនប្រាណវិញ្ញាណនេះ បណ្ដាលមកពីសញ្ញាខន្ធ ពីវេទនាខន្ធ ពីសង្ខារខន្ធ ដែលវិញ្ញាណឯងបានត្រូវបញ្ជាក់ម្ដងទៀត ដូច្នេះឃើញថាហាក់ដូចជាវិញ្ញាណនេះជាឥស្សរភាព ក្នុងប្រជុំធាតុទាំងឡាយរបស់មនុស្ស រឿង ឃោជិកាភិក្ខុដែលមានសម្ដែងក្នុងគម្ពីរទីឃនិកាយ មានសេចក្ដីថាដូច្នេះ ខ្លួនខ្ញុំជារូបដែលអាស្រ័យដោយប្រជុំ ៤ នៃធាតុ កើតឡើងដោយបិតានិងមាតា រស់នៅដោយអាហារ ហើយមានធម្មតាក្សមានជាតិត្រូវតែរលាយទៅវិញ ឯវិញ្ញាណរបស់ខ្ញុំ ដែលមកជាប់នៅជាមួយនោះ នៅជាប់នឹងខន្ធទាំងនោះ ។

មានសេចក្ដី ១ ដែលព្រះសម្មាសម្ពុទ្ធសម្ដែងប្រារព្ធនឹងមហាអានន្ទ ក្នុងគម្ពីរ ទីឃនិកាយនោះ ច្បាស់លាស់ណាស់ គឺទ្រង់សួរមហាអានន្ទថា ម្នាលអានន្ទ ចុះប្រសិនបើវិញ្ញាណមិនបានចូលទៅក្នុងគភ៌នៃមាតា តើនាមនិងរូបអាចតាក់តែងនៅក្នុងគភ៌នៃមាតាដែរឬអ្វី ព្រះមហាអានន្ទ ឆ្លើយថានាមនិងរូបមិនអាចតាក់តែងនៅបានឡើយ ព្រះសព្វញ្ញុពុទ្ធទ្រង់សួរទៀតថា ចុះប្រសិនបើវិញ្ញាណនោះចូលទៅក្នុងផ្ទៃ នោះហើយ តែលុះក្រោយមកក៏ចេញចាកបោះបង់ទីកន្លែងនោះវិញ បើដូច្នេះ តើនាមនិងរូបអាចកើតឡើងបានឬមិនបាន មហាអានន្ទ ឆ្លើយទូលតបវិញថាកើតមិនបានទេ វេលានោះព្រះបរមគ្រូទ្រង់សួរតទៅទៀតថា ចុះ

ប្រសិនបើវិញ្ញាណដែលមានក្នុងកុមារឬកុមារីនោះ បោះបង់ចោលនូវចោល ចេញ តើនាមរូបនោះប្រព្រឹត្តទៅបានឬទេ មហាអានន្ទ ឆ្លើយតប ទៀតថា ប្រព្រឹត្តទៅមិនបានទេព្រះអង្គ ។

គម្ពីរដដែលនេះសម្ដែងថា ឯវិញ្ញាណ នោះគឺជាធម្មជាតិដែលគ្មាន បំនួនដែលទីបំផុត ដែលជាពន្លឺទូទៅ គឺជាធម្មជាតិដែលមិនមែនជាទឹក មិនមែនជាដី មិនមែនជាភ្លើង មិនមែនជាខ្យល់ និង ថាជាធំក៏មិនបានតូច ក៏មិនបាន ខ្សោយក៏មិនបាន ខ្លាំងក៏មិនបាន ល្អក៏មិនបាន អាក្រក់ក៏មិនបាន គឺថាជាធម្មជាតិដែលកើតរលត់ជាមួយគ្នានឹងនាមរូប ។

ប៉ុន្តែបើនាមនិងរូបប្រាស្រ័យនិងវិញ្ញាណ ឯវិញ្ញាណក៏ប្រាស្រ័យនិង នាមរូបដែរ ។

ព្រះបរមសាស្ដាបារទ្រង់សួរមហាអានន្ទ ថា ម្នាល អានន្ទ ចុះ ប្រសិនបើវិញ្ញាណលែងពឹងពាក់អាស្រ័យនិងនាមរូប តើជាតិជរាមរណៈ ដែលជាដើមឬសរបស់ទុក្ខ និងនៅមានតទៅទៀតដែរឬអ្វី មហាអានន្ទ ឆ្លើយតបវិញថា ជរាព្យាធិនិងមរណៈមិនមានទៀតឡើយ បើដូច្នេះម្នាល អានន្ទ នេះហើយជាហេតុ នេះហើយជាតួ នេះហើយជាដើមឬស នេះ ហើយជាគោលរបស់វិញ្ញាណគឺនាមនិងរូបនេះឯងហើយ ។

មានពុទ្ធបរិស័ទ្ធ ១ អង្គឈ្មោះ សាតិ ជឿថាវិញ្ញាណរបស់មនុស្សសព្វ ថ្ងៃនេះ ជាវិញ្ញាណដែលជាប់តគ្នាមកពីវិញ្ញាណកាលជាតិមុន ៗ គម្ពីរ មជ្ឈិមនិកាយសម្ដែងថាសេចក្ដីជឿនេះជាសេចក្ដីជឿខុស ។

មានគម្ពីរខ្លះក្នុងពុទ្ធសាសនា ដូចយ៉ាងគម្ពីរ មជ្ឈិមនិកាយ និង អភិធម្មកោសសម្ដែងថាវិញ្ញាណនោះ បណ្ដាលមកអំពីគន្ធព្វ ដែលជាធម្មជាតិល្អិតក្រៃលែងចេញមកពីខ្លួនមនុស្សម្នាក់ ដែលទៅបដិសន្ធិក្នុងគភ៌ថ្មី ប៉ុន្តែកន្លែងត្រង់នេះ មិនបានសម្ដែងឲ្យច្បាស់ឡើយ ។

មានតែធាតុម្យ៉ាងទៀតដែលហៅថា សត្ត នោះជួនកាលគេហៅថាជាធម្មជាតិដែលទៀងជានិច្ចរបស់អត្តភាព ប៉ុន្តែឯសត្តនេះ ក៏មិនប្លែកពីអាត្មន មិនប្លែកពីជីវ មិនប្លែកពីបុគ្គលឡើយ គឺជាឈ្មោះទាំងប៉ុន្មាននេះ សំដៅទៅលើអត្តភាពតែ ១ ប៉ុណ្ណោះ ប៉ុន្តែគម្ពីរទាំងអស់មិនបានសម្ដែងឲ្យជាការដាច់ស្រេចសោះ ។

ក្នុងគម្ពីរ អភិធម្មកោស សម្ដែងថាព្រះនាគសេនលោកពោលថា ធម្មជាតិដែលរស់នៅឬជីវនោះគ្មានទេ ហើយបើគ្មានដូច្នេះ ឲ្យថាជីវនោះមានសណ្ឋានដូចជារូប ឬប្លែកគ្នាពីរូបដូចម្ដេចបាន ។

ដូច្នេះឃើញថា បើជាជាតិកំណើតរបស់មនុស្សនីមួយ ៗ អាស្រ័យដោយអំពើឬកម្មរបស់ខ្លួនតាំងពីជាតិមុន ៗ មកនោះ ក៏គ្មានធម្មជាតិណាមួយដែលចេញផ្លាស់ពីជាតិមុន ៗ នោះឡើយ គឺថាបុគ្គលដែលបានសោយនូវផលកម្មក្នុង ១ ជាតិៗ នោះ មិនមែនជាតួបុគ្គលដែលធ្វើកម្មនោះឡើយ ប៉ុន្តែបុគ្គលនោះមិនមែនជាបុគ្គលដទៃទេ គឺជាធម្មជាតិដែលទាក់ទងគ្នា ។

ឯវិញ្ញាណនិងធាតុឯទៀតនោះ សុទ្ធតែជារបស់បណ្ដោះអាសន្នទាំងអស់ ប៉ុន្តែធាតុទាំងប៉ុន្មាននេះហើយដែលប្រាស្រ័យគ្នានឹងធាតុផ្សេង ៗ អំពីជាតិមុន រលកនៅក្នុងសមុទ្រនោះមិនមែនកើតដោយទឹកដែលផ្លាស់កន្លែងឡើយ គឺកើតអំពីអាការដែលទឹកកម្រើកជូនគ្នាទៅ ឯទឹកនោះឥតមានផ្លាស់កន្លែងឡើយ នៅតែកន្លែងដដែលដូចដើម ឯជាតិរបស់មនុស្សវិញក៏មានសណ្ឋានដូចគ្នាដែរ គឺជាអាការដែលកម្រើកជូនគ្នានោះឯង ឥតមានអ្វីជិតជាប់ទៅជាមួយអាការនោះឡើយ សេចក្ដីនេះឃើញថាជាការលំបាកនឹងនិយាយឲ្យស្រឡះ អំពីសេចក្ដីទាក់ទងនៃភពពី ១ ទៅ ១ លំបាកនឹងគិតអំពីចំណោទខាងក្រោយនេះណាស់ គឺចំណោទដែលចោទថា តើធាតុអ្វីដែលចូលទៅក្នុងនិព្វាននោះ ត្រង់នេះ យើងមានសេចក្ដីដែលយើងមិនស្គាល់ ២ យ៉ាង នៅចំពោះមុខយើង គឺធាតុដែលចូលទៅកាន់និព្វាននោះ ១ ហើយនិងព្រះនិព្វាននោះ ១ សេចក្ដីទាំង ២ នេះ យើងមិនបានស្គាល់ទាំងអស់ ។

អំពីនិព្វានរបស់ អរហន្ត ដែលហៅថា សឧបាទិសេសនិព្វាន ឬនិព្វាននៅ ឧបាទិ នោះ យើងបានដឹងថាព្រះអរហន្តលោកនៅមានអាយតន ទាំងអស់ នៅមានប្រាជ្ញាមានវិញ្ញាណ ដែលសម្អិតសម្អាង ដោយផ្ចិតផ្ចង់ ហើយម្យ៉ាងទៀតព្រះអរហន្តនោះ ក៏មានទាំងអានុភាពយ៉ាងខ្ពស់ផង ប៉ុន្តែលុះព្រះអរហន្ត លោកចូលទៅកាន់ព្រះនិព្វានដែលគ្មាន

ឧបាទិ ឬ អនុបាទិសេសនិព្វាននោះ តើដូចម្តេចទៅវិញ ទ្រង់នេះ គម្ពីរ សំយុត្តនិកាយ មានសម្តែងសេចក្តី ២ បទដូចមានខាងក្រោយ ។

បទទី ១ ថា កាលនោះមានពុទ្ធបរិស័ទ ១ អង្គចូលនិព្វាន ហើយព្រះសម្មាសម្ពុទ្ធជាម្ចាស់ទ្រង់សម្តែងថា រូបក្ខន្ធ នោះធ្លាយអស់ទៅហើយ វេទនាខន្ធ ក៏ស្ងួតស្រពោនអស់ សញ្ញាខន្ធ ក៏រលត់ សង្ខារខន្ធ ក៏ឈប់សម្រាក វិញ្ញាណខន្ធ ក៏ចូលអាស្រ័យក្នុងទីជ្រក ។

បទទី ២ ថា កាលនោះមានពុទ្ធបរិស័ទ ១ អង្គនាមថា គោធិកា ភិក្ខុចូលនិព្វានដោយធ្វើនូវអត្តឃាដ ហើយព្រះសម្មាសម្ពុទ្ធទ្រង់មានបន្ទូលប្រារព្វនឹងពុទ្ធបរិស័ទទាំងឡាយថា តើវិញ្ញាណរបស់ គោធិកា នេះទៅចូលជ្រកក្នុងទីណា គោធិកា ចូលនិព្វានហើយ ។ វិញ្ញាណរបស់ គោធិកា នេះឥតសល់ជ្រកនៅក្នុងទីណាឡើយ ។

ក្នុងនិទានទាំង ២ បទខាងក្រោយនេះ ខ្ញុំសម្គាល់ឃើញថាបទទី ១ ដែលសម្តែងថា វិញ្ញាណចូលឈប់សម្រាក នោះមិនមែនត្រូវយល់ថាជាគ្មានវិញ្ញាណ ឬ ជាសូន្យវិញ្ញាណឡើយ ហើយបទទី ២ ដែលសម្តែងថា វិញ្ញាណឥតសល់ជ្រកនៅក្នុងទីត្រង់ណា នោះត្រូវយល់ថាឥតសល់នៅក្នុងភពយើងវិញ ព្រោះនិព្វានជាភពដទៃ ។

សេចក្ដីទាំងនេះនាំយើងឲ្យនឹកឃើញពាក្យបុច្ឆាខាងក្រោយនេះទៀត គឺពាក្យដែលថា ព្រះនិព្វាននោះជាអ្វី មានសណ្ឋានដូចម្ដេច ព្រះសម្មាសម្ពុទ្ធសម្ដែងទុកជាអ្វីៗ ទាំងអស់សុទ្ធតែមិនទៀងជា អនិច្ចំ ទាំងអស់ ប៉ុន្តែមិនទៀងតែក្នុងលោកនេះទេ តពីសេចក្ដីនេះមក យើងត្រូវពិចារណាសួរខ្លួនយើងថា ចុះអ្វីៗដែលមិនមែនជាក្នុងលោកនេះតើជាធាតុទៀងឬទេ ជាធាតុមិនស្លាប់ឬទេ ជាអមតធាតុឬទេ មាននិទាន ១ សម្ដែងថាដូច្នេះ ភិក្ខវេ ម្នាលភិក្ខុទាំងឡាយអើយ ឯសេចក្ដីដែលមិនកើតឡើង មិនកឡើង មិនតាក់តែងឡើង មិនបដិសន្ធិឡើងនោះ មានពិតហើយប្រសិនបើគ្មានធម៌ដែលមិនកើតនោះ រីជាតិដែលកើតឡើងហើយ រកទីបំផុតគ្មានឡើយ ប៉ុន្តែបើមានធម៌ដែលមិនកើតដូច្នេះហើយ ក៏មានទីបំផុតដូចគ្នា ។

ក្នុងគម្ពីរទាំងប៉ុន្មាន យើងមិនមានឃើញសេចក្ដីឯណាដែលសម្ដែងឲ្យច្បាស់លាស់ជាងនេះទៅទៀតឡើយ យើងយល់ឃើញថា គួរតែទុកដាក់សេចក្ដីទៀង ដែលមានសភាពផ្ទុយគ្នានឹងសេចក្ដីមិនទៀង ក្នុងលោកនេះថាជាគូគ្នានឹងព្រះនិព្វាន ដែលមិនមែនជាក្នុង លោកនេះ និព្វានគឺជាសេចក្ដីមិនប្រែប្រួល គឺជាសេចក្ដីដែលមិនកើតទៀត គឺជាសេចក្ដីដែលមិនតាក់តែងឡើងដោយអំពើកាលជាតិមុន ៗ ។

ជាមុននឹងវិនិច្ឆ័យសេចក្ដីដោយច្បាស់ឬមិនសូវច្បាស់ តាមស្ថានទាំងប៉ុន្មាន ដែលបានពោលមកនេះហើយ យើងត្រូវពិចារណារកសេចក្ដីនេះ ១ សិន គឺសេចក្ដីដែលចោទថា ចុះហេតុអ្វីបានជាព្រះសព្វញ្ញុពុទ្ធមិន

បានសម្ដែងឲ្យច្បាស់ប្រាកដ អំពីធាតុទាំងប៉ុន្មានដែលប្រាសចាករូប ១ ទៅកាន់រូប ១ ទៀតអំពីធាតុណាដែលទៅកាន់ព្រះនិព្វាន ហើយព្រះនិព្វាននោះដូចម្ដេចខ្លះ ៗ

ដែលសួរយ៉ាងដូចនេះ មិនជាខុសឆ្គងយ៉ាងណាទេ ប៉ុន្តែយើងបានដឹងថាមានសេចក្ដីខ្លះ ដែលជាឥតប្រយោជន៍ដល់ព្រះសម្មាសម្ពុទ្ធ ព្រោះជាសេចក្ដីទាំងនោះជាការហួសវិស័យរបស់មនុស្ស គឺប្រាជ្ញាចាក់មិនដល់ លើកតែព្រះអរិយបុគ្គល ដែលលោកបានដល់ថ្នាក់បំផុតនៃព្រះអរហន្ត កាលណាតែមានពុទ្ធបរិស័ទណា ១ ទូលសួរព្រះអង្គអំពីសេចក្ដីណាដែលប៉ះពាល់ដល់បរមត្ថកថានោះ ព្រះអង្គមិនព្រមឆ្លើយតាមពាក្យសួរនោះឡើយ លុះពុទ្ធបរិស័ទ ១ អង្គនាមថា មាលុងក្យាបុត្ត ចង់ទូលសួរព្រះអង្គ ៗ មានបន្ទូលថាដូច្នេះ ចុះតថាគតបានអនុញ្ញាតអ្នកឲ្យរិះគិតអំពីលោក តើទៀងឬមិនទៀង ជាមានទីបំផុតឬគ្មានទីបំផុតឬអ្វី តថាគតបានអនុញ្ញាតឲ្យអ្នកគិត ថាជីវ ឬធម្មជាតិដែលរស់នៅនោះ មានសណ្ឋានដូចជារូបឬមិនដូចឬអ្វី ថាព្រះអរហន្តរស់នៅជាក្រោយដែលទម្លាយបញ្ច-ខន្ធទៅ ឬមិនរស់នៅឬជារស់នៅ និងមិនរស់នៅព្រមគ្នាឬអ្វី មាលុងក្យាបុត្ត ទូលតបវិញថា ព្រះអង្គមិនបានអនុញ្ញាត ឲ្យគិតអំពីសេចក្ដីទាំងប៉ុន្មាននោះឡើយ បានជាតថាគតមិនបានពន្យល់អ្នកអំពីរឿងទាំងនេះ ព្រោះវិជ្ជាទាំងនេះឥតមានប្រយោជន៍អ្វីដល់ផ្លូវព្រះអរិយឡើយ ហើយ

មិនមែនជាសេចក្ដីសុខ មិនមែនជាសេចក្ដីត្រាស់ដឹងឬពន្លឺទេ ដែលជាមានប្រយោជន៍ក្នុងផ្លូវទាំងប៉ុន្មាននេះ គឺធម៌ទាំងប៉ុន្មានដែលតថាគតបានសម្ដែងហើយអំពី ទុក្ខសច្ច គឺសេចក្ដីពិតអំពីទុក្ខ ឬកិរិយាឈឺចាប់ និរោធសច្ច គឺសេចក្ដីពិតអំពីកិរិយាដែលរលត់ទុក្ខឬរលត់សេចក្ដីឈឺចាប់ និរោធសច្ច គឺសេចក្ដីពិតអំពីផ្លូវដែលនាំទៅកាន់ទីរលត់ទុក្ខឬរលត់សេចក្ដីឈឺចាប់ ដោយហេតុនេះ ម្នាលមាលុង្ក្យបុត្ត អ្វីៗដែលតថាគតមិនបានសម្ដែង នោះត្រូវទុកឲ្យនៅជាមិនបានសម្ដែងដូច្នោះចុះ (មជ្ឈិមនិកាយ) ។

អ្នកឯណាដែលប្រាថ្នានឹងរិះគិតអំពីផ្លូវទាំងប៉ុន្មានដែលព្រះសម្មាសម្ពុទ្ធមិនបានសម្ដែង ដោយព្រះអង្គយល់ឃើញថាឥតប្រយោជន៍ នោះត្រូវពិចារណាដល់សេចក្ដីដែលព្រះអង្គបានឆ្លើយនឹង មាលុង្ក្យបុត្តខាងលើនេះ ឯរឿងរ៉ាវកាលអំពីព្រះបរមគ្រូប្រថាប់នៅក្នុងព្រៃសំសាបានោះ ធ្វើឲ្យយើងយល់បាន ព្រះអង្គក៏បានរិះគិតអំពីសេចក្ដីទាំងនេះដែរ ហើយទ្រង់ឃើញច្បាស់នូវសេចក្ដីទាំងនោះឥតបន្លោះ គឺកាលនោះព្រះអង្គសម្ដែងប្រាប់ពួកនឹងពុទ្ធបរិស័ទទាំងឡាយថា ឯស្លឹកឈើសំសាបាដែលតថាគតក្ដាប់ក្នុងព្រះហស្ត មានចំនួនតិចជាងស្លឹកដែលជាប់នៅលើដើមមានប្រការយ៉ាងណា រីធម៌ដែលតថាគតបានសម្ដែងប្រាប់អ្នកទាំងឡាយពល់គ្នាក៏មានប្រការដូច្នោះដែរ គឺថាធម៌ដែលបានសម្ដែងនោះតិចតួចស្ដួច

ស្ដើងណាស់ រឹតមិនដែលគតថាគតបានរកឃើញជាច្រើនអនេកឥតគណនា ។

កុងគម្ពីរ មិលិន្ទបញ្ហា នោះយើងបានឃើញ សេចក្ដីដែលនិយាយគ្នាពីបទដែលសម្ដែងខាងលើមករួចហើយ គឺព្រះបាទក្រុងមិលិន្ទសង្ស័យ អំពីរឿងដែលព្រះសម្មាសម្ពុទ្ធមិនព្រមឆ្លើយប្រាប់ដល់ មាលុ-ងក្យបុត្ត ហើយព្រះនាគសេនឆ្លើយតបទៅវិញថា ឯចំណោទ ឬសេចក្ដីចោទសួរនោះមាន ៤ យ៉ាង ។

១- គឺចំណោទ ដែលគេអាចនឹងឆ្លើយប្រាប់ដោយត្រង់ហើយឲ្យជាក់ច្បាស់ ។

២- គឺចំណោទដែលគេនឹងពន្យល់បានលុះតែពិនិត្យមើលដោយល័កខ័ន ។

៣- គឺចំណោទ ដែលគេនឹងពន្យល់បានលុះតែធៀបទៅនឹងចំណោទឯទៀត ដូចគ្នាដែលបានរកឃើញហើយ ។

៤- គឺចំណោទដែលត្រូវតែជៀសវាងចេញឲ្យឆ្ងាយ ដូចជាសេចក្ដីចោទសួរអំពីលោកជាផុតឬមិនផុត រូប និង ជីវ តើមានសណ្ឋានដូចគ្នាឬមិនដូច ។ ល ។

ក៏ឯសេចក្ដីដែលទូលសួរអំពីព្រលឹងនៅមាន ឬ មិនមាននិងគុណជាតិរបស់ព្រះនិព្វាននោះ ចូលទៅក្នុងចំណោទដែលព្រះសម្មាសម្ពុទ្ធមិនព្រមទទួលឆ្លើយឡើយ ។

ជាបុននឹងទៅឆ្ងាយពីនេះទៅទៀត យើងត្រូវពិចារណាមើល ថាឯ

សេចក្ដីដែលថាមិនចំ ដែលគ្មានអ្នកណាថាឲ្យប្រាកដជាក់នោះ មិនមែនមានតែក្នុងក្បួនខាងក្នុងពុទ្ធសាសនាឡើយ ឯក្នុងវិទ្យាសាស្ត្ររបស់យើងក្នុងប្រទេសយុរ៉ុប ក៏មានសណ្ឋានដូចគ្នាដែរ វេលាណាព្រោរព្វដល់សេចក្ដី ដែលនិយាយអំពី វិញ្ញាណ ឬ ចិត្តនោះ សេចក្ដីមិនច្បាស់ប្រាកដមានក្នុងពេលនោះហើយ ហើយគេងយកវិធីយ៉ាងចង្អៀត មិនមែនជាវិធីយ៉ាងឆ្ងាយយល់យកមកនិយាយ យើងមិនដឹងជាដោយហេតុអ្វី បានជារូបទាំងឡាយដែលមកប៉ះពាល់ដល់ចក្ខុ ហើយទៅបាន ឯសញ្ញាឯណោះជាអ្នកកត់សម្គាល់វិញ អំពីប្រាជ្ញាស្មារតីនោះយើងមិនអាចនឹងដឹងឡើយ ក្នុងសាសនាកាតូលិក គេមិនបានសម្ដែងអំពីបែបយ៉ាងឋានសួគ៌ និង ឋាននរកឲ្យជាការច្បាស់លាស់ទេ ហើយអ្នកឯណាដែលមើលសេចក្ដី ដែលអធិប្បាយ អំពីឋានទាំងនោះបានសេចក្ដីផ្សេងពីគ្នា តាមយោបល់តែរៀងខ្លួន ព្រោះសេចក្ដីដែលសម្ដែងនោះ មានសភាពព្រលាំមិនពិស្ដារ ឲ្យជាការដាច់ខាតឡើយ ។

ឯយោបល់យល់ឃើញរបស់យើង ដែលយើងខំប្រឹងទាញយកមកនោះ គឺយើងគិតនិយាយឲ្យតែងាយស្រួលស្ដាប់ គឺថាកាលជាន់ដើមបំផុតនោះ ព្រះពុទ្ធសាសនា ជាសាសនាដែលមានធម៌អាថ៌ឆ្ងាយនឹងរៀនសូត្រណាស់ពីដ៏ដំបូង មិនមែនជាផ្លូវបរមត្ថទាំងអស់ ដែលស្មុគស្មាញក្រនិក្រនក់នោះឡើយ គឺជាវិន័យសណ្ដាប់ដល់ មហាជនទាំងអស់ គឺជាក្បួនដែលធ្វើខ្លួនឲ្យរួចអំពីទុក្ខ ដោយប្រព្រឹត្តតាមសិក្ខាបទផ្សេង ៗ ដែល

មានសេចក្ដីពិតប្រាកដនៅក្នុងនោះ ទាំងនេះហើយ ជាសម្បត្តិដើមរបស់ព្រះពុទ្ធសាសនា លុះតែក្រោយមកជាច្រើនតមនុស្ស ក៏សេចក្ដីខ្វល់សេចក្ដីសង្ស័យរបស់មនុស្ស នាំឲ្យធម៌ទាំងនោះបង្អៀតទៅអស់ប្រឡូវិធីសាសនាចូលគ្នាទៅទៀត បោះបង់ឯសម្បត្តិដើមដែលស្រណុកនឹងរៀន ស្រណុកនឹងគិត ទៅយកឯសេចក្ដីដែលលំបាកនឹងពិចារណាមកគិតវិញ ឧបមាដូចជាគេចង់ដឹងថា តើតាបសដែលប្រាថ្នានឹងធ្វើនូវអំពើអត្តឃាដនោះត្រូវប្រើខ្សែ កាំបិត ឬអត់បាយឲ្យស្លាប់ ឬលោតទៅក្នុងជ្រោះភ្នំ ស្ថានទាំងនេះមានបែបដូចជាក្នុងប្រទេសយូរុប ក្នុងមជ្ឈិមកាលដែរ គឺគេជជែកពិគ្រោះគ្នា អំពីការដែលឥតប្រយោជន៍ហើយជួនកាលឥតសមគួរផង អំពីសាសនាកាតូលិក មានជជែកហួសអំពីសេចក្ដីបញ្ញត្តិដែលព្រះគ្រិស្ដបានលាក់ទុកទៅទៀត ។

បើដូច្នេះឃើញថាអំពីបរិនិព្វាននេះ យើងគ្មានអ្វីជាប្រាកដឡើយ ឯគម្ពីរដីកានានា ក្រៅពីគម្ពីរទាំងប៉ុន្មានដែលបានពោលក្នុងសេចក្ដីនេះ ក៏សម្ដែងតែត្រឹមថា ព្រះនិព្វាននេះជាភាពសណ្ឋានក្រៅអំពីមនុស្សលោកយើង ។

មានឧទាន ១ សម្ដែងថា ឯព្រះនិព្វាននោះគឺជាកន្លែងដែលគ្មានទឹក ដី, ភ្លើង, ខ្យល់, មិនមែនជាអាកាសទេ, មិនមែនជាវិញ្ញាណទេ, មិនមែនជាគ្មានអ្វីសោះ, មិនមែនជាសញ្ញា, មិនមែនជាអសញ្ញា, មិនមែនជាលោកឯណេះមិនមែនជាលោកឯណោះ មិនមែនជាយប់ មិនមែនជាថ្ងៃ ។

បើដូច្នេះ គឺជាគតមិនហៅថាមក មិនហៅថាទៅ មិនហៅថានៅ មិនហៅថាស្លាប់ មិនហៅថាកើត ហៅថាគ្មានមេ គ្មានពូជ គ្មានអារ គ្មានអប់ គឺជាទីបំផុតនៃទុក្ខ ឬជាទីបំផុតនៃសេចក្ដីឈឺចាប់ គឺជាមិនបដិសន្ធិជាថ្មីទៀត ។ល។

ព្រះនាគសេនពន្យល់ទៅក្រុង មិលិន្ទ ថា ឯព្រះនិព្វាននោះ មិនអាចនឹងបណ្ដាលឡើងដោយហេតុអ្វីណា ១ ឡើយ ដោយហេតុថា ព្រះនិព្វាននោះ មិនមែនជាប្រជុំនៃធាតុផ្សេង ១ ដែលអាស្រ័យនូវគ្នានឹងគ្នា នាំឲ្យមានភាពសណ្ឋានជាទីសម្គាល់បាននោះឡើយ ។

ឯព្រះនិព្វាននោះ មិនមែនជានៅក្នុងលោកយើងនេះទេ ដោយហេតុនេះបានជាយើងមិនអាចនឹងដឹងបានដោយ អាយតនៈ របស់យើង ដែលជា សេក្ខបុគ្គល នោះ គម្ពីរ សំយុត្តនិកាយ សម្ដែងថា ឯមហាសមុទ្រនោះជ្រៅណាស់ នឹងវាស់មិនបាន នឹងស្ទង់មិនបាន មានប្រការយ៉ាងណា រីឯព្រះនិព្វាននោះ មនុស្សដែលនៅជាសេក្ខបុគ្គលនៅឡើយ នឹងដឹងស្គាល់ថាដូច្នេះដូច្នោះមិនបាន មានប្រការដូច្នោះឯង ឯព្រះអរហន្តដែលលោកដល់ហើយនូវព្រះនិព្វាននោះ មានជម្រៅនឹងវាស់មិនបាន នឹងស្ទង់មិនបាន ដូចយ៉ាងមហាសមុទ្រដូច្នោះឯង ។

កាលណាព្រះអរហន្ត លោកចេញពីបម្រើនឈានសមាបត្តិមកវិញនោះ លោកបន្ទឹងនូវវាចាថាដូច្នេះ ព្រះនិព្វានជាទីរលត់នូវប្រាថ្នា ជាទីសុខ ជាទីប្រសើរ ប៉ុន្តែនឹងគិតបរិយាយស្រាយសេចក្ដីសុខនោះ ឲ្យបានប៉ះពាល់

យល់ដល់មនុស្សឯទៀត អំពីសេចក្ដីសុខដែលបានសោយក្នុងវេលាចូលឈាននោះមិនកើត ព្រោះតែកាលណាចេញពីឈានមកវិញហើយ នោះព្រះអរហន្តលោកមានកងកាយ, អវៈយវៈ, អាយតន, ឥន្ទ្រិយ និងសម្ដីភាសា តាមធម្មតាជនដែលជាសេក្ខបុគ្គលដូច្នោះ ដោយហេតុនេះហើយបានជាគ្មានពាក្យអ្វីនឹងពោលប្រាប់ឲ្យចំ អំពីសេចក្ដីសុខក្នុងព្រះនិព្វាននោះ បើដូច្នេះតើត្រូវវិនិច្ឆ័យសេចក្ដីថា ព្រះនិព្វាននោះគ្មាននៅសល់វិញ្ញាណអ្វីដែលមិនមែនជាវិញ្ញាណធម្មតាទេ ឬអ្វី ។

ប្រាជ្ញារបស់មនុស្សយើង ដែលនៅជាបុថុជ្ជននៅឡើយនោះមិនអាចនឹងយល់បានឡើយ អំពីធម្មជាតិអ្វីដែលសល់នៅរបស់ព្រះនិព្វាន ហើយបើដូច្នេះ យើងនឹងថាព្រះនិព្វាននោះគ្មាននៅសល់គុណធម៌អ្វីសោះក៏ថាមិនបាន មានអ្នកប្រាជ្ញជាតិយូរ៉ុបម្នាក់ឈ្មោះ ម៉ាក់-មុល្លែ ដែលជាអ្នកប្រាជ្ញធំ ១ ក្នុងវិធីព្រះពុទ្ធសាសនាបានចារឹកទុកថា អំពីព្រះនិព្វាននេះ យើងនឹងថាជាអ្វីមិនបាន យើងគ្រាន់តែដឹងថាព្រះនិព្វានប៉ុណ្ណោះ តែគ្មានអ្នកឯណា ១ អាចនឹងថាឲ្យប្រាកដជាដូច្នេះដូច្នោះបានឡើយ ។

ឯមនុស្សខ្វាក់ព្រោះតែខ្លួនមើលមិនឃើញពណ៌ខៀវ ឬលឿង នឹងថាមនុស្សដែលមានភ្នែកភ្លឺមើលមិនឃើញដូចខ្លួន ឬក៏គ្មានពណ៌យ៉ាងនេះយ៉ាងនោះក៏ថាមិនបាន (សំយកត្រ) ។

ចំណែកខាងព្រះអរហន្តក្នុងសាសនាកាតូលិក ដែលបានធ្វើឈានដ៏ជ្រៅជ្រះហើយ នៅវេលាដែលចេញពីឈានមកវិញ ក៏មិនអាចនឹង

អធិប្បាយ អំពីសេចក្តីដែលប្រទះឃើញក្នុងវេលាដែលចូលឈាននោះ ប្រាប់យើងបានឡើយ ។

ដើម្បីនឹងបញ្ចប់សេចក្តីនេះយើងត្រូវថា ឯនិព្វានលើដីដែលហៅថា សឧបាទិសេសនិព្វាន ឬ និព្វានរបស់ព្រះអរហន្ត នោះ គឺជាអារម្មណ៍របស់លោក ដែលប៉ះពាល់នូវអមត គឺសេចក្តីពិតប្រាកដ សេចក្តីទៀងជានិច្ចឥតកើតឥតស្លាប់ នៅវេលាដែលលោកកំពុងធ្វើឈាន គឺជាព្រះអរហន្ត លោកបានដល់ទីស្ទើរតែនឹងផុតពីលោកយើងទៅហើយ ដោយអំណាចឧត្តមវិជ្ជាឬដោយប្រាជ្ញាញាណយ៉ាងខ្ពស់ ដែលលោកបានដល់នៅវេលាដែលលោកតាំងចូលឈាន សមាបត្តិទៅ ឈាននោះឯងនាំទៅប៉ះផ្ទាល់នឹងព្រះនិព្វាន ក្នុងវេលានោះលោកបាននូវញាណ ១ យ៉ាងដែលអាចនឹងកត់សម្គាល់ផ្ទាល់តែម្តងបាន មិនបាច់ត្រូវការដល់ខន្ធទាំងឡាយឡើយ ។

ឯចំណែកខាងនិព្វានឥតសល់ ដែលហៅថា អនុបាទិសេសនិព្វាន ឬបរិនិព្វានវិញនោះ គឺជាសេចក្តីដែលទៀងជានិច្ចសេចក្តីដែលពិតប្រាកដ សេចក្តីដែលគ្មានបច្ច័យទាក់ទងតទៅទៀតដែលមាននៅ ប៉ុន្តែយើងមិនអាចនឹងយល់ថាដូច្នេះដូច្នោះបាន នៅវេលាក្រោយដែលបុគ្គលទម្លាយខន្ធទៅតើអ្វីដែលចេញពីខ្លួននោះទៅ ស្ថានត្រង់នេះទៀតយើងក៏មិនបានដឹងជាយ៉ាងដូចម្តេច ព្រោះប្រាជ្ញាបុថុជ្ជនមិនអាចនឹង

ឈ្វេងយល់បានឡើយ យើងត្រូវត្រឡប់សាទៅរកសេចក្ដីដែលនិយាយអំពីផ្ទេរជាតិ ពីភព ១ ទៅភព ១ វិញ ត្រង់ស្ថាននេះទំនងជាគ្រាន់តែផ្ទេរបញ្ញានផ្ដល់ប៉ុណ្ណោះ គឺជាជាកិរិយាដែលញ័ររញ្ជួយ ដែលក្រិតទុកហើយដោយជាតិអំពីមុន ឥតមានធាតុអ្វីរបស់មនុស្សទៅជាគណបក្នុងកិរិយាដែលផ្ទេរជាតិនោះឡើយ ។

សេចក្ដីយល់ឃើញនេះ ហាក់ដូចជាប្រកបនឹងគោលចារឹករបស់ក្បួនវិជ្ជាក្នុងសម័យថ្មីដែលអធិប្បាយអំពីកិរិយាដកបន្ទយនៃចិត្តដែលរឹងត្អឹងចេញ ។

**-ចប់-**

# សេចក្ដីឱ្យដំណឹង

ក្នុងទស្សនាវដ្ដីខ្មែរនេះ យើងចាប់ផ្ដើមសេចក្ដីអធិប្បាយរឿងដែលចាងហ្វាងព្រះរាជបណ្ណាល័យកម្ពុជា បានចេញត្រួតត្រាពិនិត្យតំបន់ខ្មែរទាំងប៉ុន្មានក្នុងដែនកូសាំងស៊ីន មួយអន្លើនឹងលោកព្រះគ្រូសង្ឃវិជ្ជា **តាគ** ជាអាចារ្យបង្រៀនភាសាសំស្ក្រឹតនៅសាលាបាលីជាន់ខ្ពស់ក្នុងក្រុងភ្នំពេញ ។

ក្នុងវេលានេះយើងអាចនឹងធ្វើឱ្យឃើញបាន កិច្ចការស្នាដៃ ដែលបានកើតឡើងយ៉ាងឆាប់ដោយអំណាចការដើរត្រួតត្រានេះ ។

១ លោកគូវៃរណើរ ស្រុកកូសាំងស៊ីន បានបញ្ជូន លោកសង្ឃ ២៩ អង្គ មកនៅរៀនក្នុងវត្តលង្កាពមសព្វថ្ងៃនេះ ដោយបានចេញសាហ៊ុយស្បៀងអាហារប្រគេនគ្រប់អង្គ ។

២- ជាតិខ្មែរទាំងឡាយនៅស្រុកកូសាំងស៊ីន ដែលមានប្រាថ្នានឹងជាវ

សៀវភៅផ្សេង ៗ របស់ព្រះរាជបណ្ណាល័យ អាចនឹងចូលទៅជាវបានទៅទីកន្លែងដូចមានខាងក្រោយ គេជាវថ្លៃដូចគ្នានឹងក្នុងព្រះរាជបណ្ណាល័យដែរ គឺ ៖

នៅផ្ទះឈ្មោះ ថាច ស៊ីវ ក្នុងឃុំផុងកូ ខ័ណ្ឌតិងយ៉ាវ ខេត្តកន្ធឺ ។

– លោកចៅហ្វាយខេត្ត គួយ វើត្រ នៅស្រុក ទ្រី តុង ( ស្វាយ-ទង ) ។

– ចីសឹន សរ ធ្វើរាជការនៅវីប៉ុស ពៅ លៀវ ។

– លោក វិញ ថៃគៅ ចៅហ្វាយខ័ណ្ឌ ង៉ាយហ៉ក្រុង (ប្រាសាទ) ខេត្តត្រាវិញ ។

– លោក ចៅហ្វាយខ័ណ្ឌ ឌួង ទី ចៅហ្វាយខ័ណ្ឌ ១ សុកត្រាំង ខេត្តសុកត្រាំង ។

នៅវត្តឧត្តមមានជ័យ កុដិលោកគ្រូព្រះសោធិវង្ស កយ ក្នុងខេត្តរ៉ាចយ៉ា ។

ខាងក្រោយនេះយើងដាក់ប្រកាសអារេតេ ១ ច្បាប់ពីថ្ងៃ ៤ សូរយេត ឆ្នាំ ១៩២៣ ដែលជាតិខ្មែរក្នុងស្រុកកូសាំងស៊ីន បានដឹងតិចគ្នាណាស់ ហើយដែលមានសម្ដែងអំពីកិច្ចធ្វើឈាបនកម្ម ដែលរាជការបានអនុញ្ញាតឲ្យធ្វើដូចជាក្នុងស្រុកខ្មែរយើងដែរ សេចក្ដីប្រកាសនេះ យើងគួរធ្វើឲ្យជាតិខ្មែរក្នុងស្រុកកូសាំងស៊ីន បានដឹងគ្រប់គ្នា ។

ថ្ងៃ ៥ ស្ហួយេត ឆ្នាំ ១៩២ ។

ភាគកិច្ចការស្រុកកូសាំងស៊ីន

# លោកឡឺគូវែរណើរ ស្រុកកូសាំងស៊ីន

កុំម៉ង់ដើរដឺឡា ឡេស្យុងដូណើរ

. . . . . . . . .

. . . . . . . . .

## អារេតេ

ប្រការ ១- បុណ្យឈាបនកិច្ច ឬ រំលាយសពរបស់ជាតិខ្មែរក្នុងដែនកូសាំងស៊ីននោះ តាមធម្មតាត្រូវធ្វើបានជាដាក់កប់ទៅក្នុងដែនកូសាំងស៊ីនទាំងមូល ។

ប្រការ ២ – ដែលនឹងធ្វើកិច្ចនេះ ត្រូវប្រព្រឹត្តតាមលក្ខណបញ្ញត្តិដូចមានខាងក្រោយគឺ ៖

១- ឯមរណៈតាមធម្មតានោះ នឹងត្រូវរំលាយសពបានលុះតែកន្លងហួសពីពេលដែលស្លាប់ ២៤ ម៉ោងទៅ តាមដែលមានសរសេរក្នុងក្រមរដ្ឋប្បវេណី ។

២- មរណៈដោយជម្ងឺឆ្លង ឬ ក្នុងកាលដែលមានជម្ងឺឆ្លង កំណត់ដែលត្រូវរំលាយសពនោះ នឹងបន្ថយឲ្យតិចមកទៀតបាន តាមគាត់មានយល់ឃើញ អំពីក្រសួងសុខាភិបាល ដែលត្រូវកំរិតតិចច្រើន ដូចម្ដេចតាម

ដោយហេតុភេទ និងកាលសម័យ ។

៣- មរណៈដោយគ្រោះអន្តរាយ ឬដោយសង្ស័យថាបណ្ដាលមកពីបទល្មើសជាឧក្រិដ្ឋ នោះកំណត់វេលាឈាបនកិច្ច អាចនឹងពន្យារឲ្យយឺតយូរចុះទៅទៀតបាន តាមសេចក្ដីតម្រូវរបស់ក្រសួងតុលាការ ដែលត្រូវការស៊ើបសួរ និងក្នុងវង់កំណត់ដែលត្រូវក្រសួងពេទ្យសង្កេតពិនិត្យ ឲ្យបានស្ដែង ដើម្បីសម្រួលដល់ការស៊ើបសួររបស់តុលាការ ។

ប្រការ ៣- សេចក្ដីសុំធ្វើបុណ្យឈាបនកិច្ចនោះ មុននឹងសម្រេចធ្វើកិច្ចបាន ត្រូវឲ្យបានសេចក្ដីអនុញ្ញាតពីសែហ្វដឹកង់តុង (ចៅហ្វាយខណ្ឌ) ជាមុនសិន ចៅហ្វាយខណ្ឌត្រូវចេញសេចក្ដីអនុញ្ញាតនោះឲ្យដោយទទួលខុសត្រូវលើខ្លួន ហើយដោយបានទទួលសេចក្ដីកត់ហេតុ ១ ច្បាប់ផងដែលខ្លួនបានពិនិត្យយល់ព្រមតាម ទើបផ្ញើសេចក្ដីកត់ហេតុនោះ ទៅជូនលោកដេឡេគេក្រសួងរដ្ឋបាលនាទីរួមខេត្ត ។

ឯសេចក្ដីកត់ហេតុនោះ ត្រូវឲ្យមានចុះសេចក្ដីសម្គាល់ផ្សេងៗដែលមានប្រយោជន៍អំពីហេតុភេទដែលបណ្ដាលឲ្យមរណៈនោះ ដោយបញ្ជាក់ឲ្យប្រាកដ តើមរណៈនោះបណ្ដាលមកពីរោគចម្លង ឬពីជម្ងឺ មានពិសធ្ងន់ ឬម្យ៉ាងវិញទៀតស្លាប់ដោយគ្រោះថ្នាក់ ឬដោយអំពើល្មើសជាឧក្រិដ្ឋ ។

សេចក្ដីកត់ហេតុនោះ ត្រូវឲ្យមានចុះហត្ថលេខា ចាន់ប្រឹប ១ ហៀង-ក្វាន ១ ញាតិយ៉ាងតិច ២ នាក់របស់មនុស្សស្លាប់ និងអ្នកជិតខាង ២ នាក់ទៀត ។

លោកចៅអធិការដែលបានទិមន្តទៅជានាយក គឺលោកអភិធម្មក្នុងបុណ្យខ្មោចនោះ ត្រូវចុះហត្ថលេខាក្នុងសេចក្ដីកត់ហេតុនោះដែរ នៅវេលាដែលសម្រេចបុណ្យឈាបនកិច្ចហើយ ។

ប្រការ ៤ - ឯសេចក្ដីអនុញ្ញាតឲ្យលើកសពធ្វើបុណ្យនោះ នឹងបើកឲ្យបាន លុះតែឃើញប្រកបដោយលក្ខណបញ្ញត្តិ ប្រកាសអារេតេពីថ្ងៃ ២០ ហ្វេវ្រីយេ ១៩១៤ ដែលសម្ដែងអំពីផ្លូវសពរបស់ជនជាតិអាស៊ីអាទិកដែលមរណភាពក្នុងប្រទេសឥណ្ឌូស៊ីន ក្នុងស្ថានទាំងប៉ុន្មាន ដូចមានខាងក្រោយ ៖

១ - អំពីកំណត់ដែលកប់នោះ ត្រូវយកតាមលក្ខណបញ្ញត្តិក្នុងប្រការ ១ ប្រសិនបើជាខ្មោចស្លាប់តាមធម្មតា ត្រូវយកតាមលក្ខណបញ្ញត្តិក្នុងប្រការ ២ ប្រសិនបើជាស្លាប់ដោយជម្ងឺមានពិសពុល ។

២ - អំពីកាលកំណត់ក្នុង ១ ឆ្នាំ ១ ដែលត្រូវលើកសពបាននោះ ត្រូវសម្រេចតាមលក្ខណបញ្ញត្តិនៃប្រការ ៧ ។

ប្រការ ៥ - ទោះជាក្នុងស្ថានយ៉ាងដូចម្ដេចក្ដី រីការសុំលើកសពធ្វើបុណ្យនោះនឹងអាចសុំបាន ចំពោះតែជាជននោះឯងជាញាតិយ៉ាងជិតនឹងខ្មោចនោះ សេចក្ដីសុំត្រូវធ្វើដោយលិខិត ត្រូវចៅហ្វាយខណ្ឌពិនិត្យបញ្ជាក់ហើយយល់ព្រមតាមជាមុន មុននឹងបញ្ជូនទៅលោករ៉េស៊ីដង់ត្រួតត្រា តាមរយៈក្រសួងដេឡេគេខាងវេជ្ជបុរាណ ។

ប្រការ ៦ - ឯទីកន្លែងសម្រាប់ធ្វើឈាបនកិច្ចនោះ ត្រូវតែជាបរិវេណនៃត្រ

សម្រេចក្នុង ១ ឃុំ ១ ដោយមានសេចក្ដីយល់ឃើញអំពីពេទ្យក្នុងខែត្រនោះ ហើយដោយលោកជាទៅអធិការបានព្រមព្រៀងផង ។

ប្រការ ៧ - អស់លោកអធិបតីក្រុមជំនុំក្រុមមឿង នៅក្រុងព្រៃនគរ និងបឹងឡឹង អស់លោកស័តមីនិស្ត្រាទ័រ ជាអធិបតីខែត្រ និងទីរួមខែត្រ ត្រូវចាត់ការតែរៀងខ្លួន ឲ្យសម្រេចតាមប្រកាសអារេតេនេះ ។

បានប្រែត្រឹមត្រូវតាមច្បាប់ដើម

ក្រុមការ ជុំ-ម៉ៅ

# អំពីដំណើរទៅក្នុងដែនកូសាំងស៊ីន

## ចំពោះខែត្រដែលមានវត្តលោកសង្ឃខ្មែរ

### ព្រះគ្រូសង្ឃវិជ្ជា មហា តាត

អាចារ្យបង្រៀនសំស្ក្រឹតនៅសាលាបាលីក្រុងភ្នំពេញ

– ១ –

ដំណើរដែលទៅក្នុងដែនកូសាំងស៊ីននេះ ជាដំណើររបស់ម៉ាដឹមូអា-ហ្វៀល. ស៊ុយសាន-ការប៉ឺឡេស ចាងហ្វាងព្រះរាជបណ្ណាល័យកម្ពុជា មានលោកគ្រូសង្ឃវិជ្ជា តាត អាចារ្យបង្រៀនក្នុងសាលាបរិយត្តិជាន់ខ្ពស់ នឹងអ្នករាជការក្នុងព្រះរាជបណ្ណាល័យម្នាក់ឈ្មោះដី ជាអ្នកទៅជាមួយ តាំងពីថ្ងៃពុធ ១១ កេចខែបុស្ស ឆ្នាំថោះនព្វស័ក ត្រូវនឹងថ្ងៃ ១៨ ខែយ៉ាំងវីយេរ ឆ្នាំ ១៩២៨ ដរាបដល់ថ្ងៃសៅរ៍ ១២ កេចខែមាឃ ឆ្នាំថោះនព្វស័កត្រូវនឹងថ្ងៃ ១៨ ហ្វេវរីយេរ ឆ្នាំ ១៩២៨ ក្នុងពុទ្ធសករាជ ២៤៧០ ។

ខ្ញុំ (ព្រះគ្រូ តាត) សូមថ្លែងរៀបរាប់ពីដំណើរនេះមានសេចក្ដីដូចម្ដេចខ្លះ នោះមានរៀបរាប់ដូចខាងក្រោយ ៖

## ដំណើរចេញពីភ្នំពេញ

ចាងហ្វាងព្រះរាជបណ្ណាល័យបានចេញពីភ្នំពេញ ទៅកាន់ទីក្រុងព្រៃ

នគរ តាំងពីថ្ងៃ ៩ ខែ យ៉ាំងវីយេរ ដោយមានកិច្ចខឹងបុណ្យ តាំងរបស់ក្នុងព្រៃនគរ ។ ចំណែកខ្លួនខ្ញុំនិងឈ្មោះដី បានចេញពីភ្នំពេញទៅនៅថ្ងៃ ១៨ ខែយ៉ាំងវីយេរ វេលាម៉ោង ៥ព្រឹក ដោយរថយន្តគួរីយេរ ដល់ម៉ោង ១២កន្លះថ្ងៃជ្រេពីត្រង់ដល់ទៅទីព្រៃនគរ បានឈប់សម្រាកក្នុងវេលាថ្ងៃរសៀលនោះដរាបដល់ព្រឹកឡើង ។

## ដំណើរចេញពីព្រៃនគរ ថ្ងៃ ១៩ ខែយ៉ាំងវីយេរឆ្នាំ១៩២៨

វេលាម៉ោង ១ កន្លះថ្ងៃរសៀល ចាងហ្វាងព្រះរាជបណ្ណាល័យ ខ្លួនខ្ញុំនិងឈ្មោះ ដី ព្រមទាំងអ្នកបររថយន្តម្នាក់ជាតិយួននិងគូលីម្នាក់របស់ ចាងហ្វាងព្រះរាជបណ្ណាល័យ រួមជា ៤ នាក់បានចេញពីព្រៃនគរចំពោះខេត្តត្រាវិញ (យួនហៅត្រាយិញ ខ្មែរហៅព្រះត្រពាំង) ចេញទៅដោយរថយន្តលេខ ៨របស់រាជការគួរវែរណឺម៉ង់ដឺឡាកូសាំងស៊ីន ដល់ម៉ោង ៦ កន្លះល្ងាច បានដល់ទៅខេត្តត្រាវិញ អស់ចម្ងាយផ្លូវចំនួន ១៩៣គីឡូ-ម៉ែត្រ ។ ចាងហ្វាងព្រះរាជបណ្ណាល័យទៅឈប់សំណាក់នៅទីផ្ទះលោក ឡាត់មីនិស្ត្រាទ័រ ឯខ្លួនខ្ញុំនិងឈ្មោះដី ទៅឈប់សំណាក់នៅវត្តកំ-ពង់ធំជាខាងជើងជិតទីផ្ទះលោក ឡាត់មីនិស្ត្រាទ័រ នោះដែរ ។ វត្ត-កំពង់ធំនោះយួនតែងហៅថា ឆ្វាអុងមាយ ជាវត្តស្អាតបាតល្អណាស់ មានរបៀបកុដិនិងវិហាររៀបរយល្អ ទីជុំក្នុងវត្តនោះស្អាតបាតឥតមានស្មៅ

ដុះឡើយ ៗ លោកចៅអធិការវត្តនេះនាម លី មានងារជាព្រះសិរីវិបុទ្ធិ-វង្ស លោកមានព្រះហឫទ័យល្អ បានរៀបចំកន្លែងឲ្យអស់យើងដែលជាអ្នកដំណើរ បានសំណាក់អាស្រ័យដោយស្រួល ព្រមទាំងភោជនាហារ លោកក៏បានចាត់ចែងឲ្យដរាបដល់ហើយកិច្ច ដែលនៅសំណាក់ក្នុងវត្ត-លោក មិនតែប៉ុណ្ណោះលោកយកព្រះហឫទ័យទុកដាក់ជួយជូនដំណើរទៅកាន់វត្តឯទៀត ៗ ផង យើងខ្ញុំមានអំណរគុណលោកមិនភ្លេចឡើយ ៗ

## ដំណើរក្នុងខេត្តត្រាវិញ ថ្ងៃ ២០ ខែយ៉ាំងវីយេរ ឆ្នាំ ១៩១៨

វេលាម៉ោង ៧ ព្រឹក ចាងហ្វាងព្រះរាជបណ្ណាល័យ បានអញ្ជើញចូលទៅក្នុងកំពង់ធំ ជាវត្តដែលយើងសំណាក់ លោក ឧក្ញាតាំមឹងស្រ្កាន័រ និងអ្នកប្រែភាសាជាតិយួន ១ នាក់ជូនទៅផង បានជួបជុំនៅលើទីសាលា ជាមួយនឹងព្រះសង្ឃក្នុងវត្តនោះ ព្រមទាំងឧបាសក ឧបាសិកាទាំងឡាយ ហើយចាងហ្វាងព្រះរាជបណ្ណាល័យ បានសួរពីចំនួនភិក្ខុសាមណេរ-ក្មេង និងចំនួនគម្ពីរហើយសួរថា លោកចង់បង្កើតសាលារៀនទេ ? ចង់ឲ្យមានគ្រូបង្រៀនទេ ? លោកគ្រូសិរីសុទ្ធិវង្ស ឆ្លើយថា ចង់បានណាស់ ប៉ុន្តែសព្វថ្ងៃនេះ កំពុងរវល់នឹងកិច្ចធ្វើបង្ហើយវិហារឲ្យហើយស្រេច ៗ រួចចុះពីសាលាដើរមើលរបៀបរៀបរយក្នុងវត្ត ហើយសរសើរថាស្អាត លោកចេះរៀបចំល្អ រួចឡើងទៅមើលគម្ពីរក្នុងកុដិលោក ៗ

ដល់វេលាម៉ោង ៨ ព្រឹក ចេញទៅវត្តកញ្ចោង ( យួនហៅវត្តទីវកឹង ) ដោយរថយន្តដែលទៅនេះ គឺចាងហ្វាងព្រះរាជបណ្ណាល័យ, ខ្ញុំ, ឈ្មោះ ជី និងសៅក្រៅទៅ ( ចីយួន ) ដែលលោក ឡាត់ទីជិស្ត្រាន់រ បាត់ឲ្យជាអ្នកជូនដំណើរ ១ នាក់ទៀត រួមជា ៤ នាក់ចេញទៅជាមួយគ្នា កាលដែលទៅដល់វត្តកញ្ចោង ក៏បានឡើងទៅលើកុដិលោកចៅអធិការ នាម សរ លោកចៅអធិការនេះ លោកធ្វើជាឧបជ្ឈាយ៍ចាស់ជរាណាស់ ហើយ ៗ ចាងហ្វាងព្រះរាជបណ្ណាល័យ បានសួរដូចរបៀបសួរឯវត្តកំពង់ធំ ហើយសួរពីសាលាបង្រៀន និងគ្រូបង្រៀន លោកឆ្លើយថា មិនត្រូវការចង់បានទេ សូមឲ្យនៅតាមទំនៀមពីដើម លោកគ្រូវត្តនេះ លោកប្រកាន់ទំនៀមរបស់លោកខ្ជាប់ខ្ជួនណាស់ ទោះបីរៀបចំដូចម្តេចនឹងឲ្យចម្រើន លោកក៏ពុំព្រមទទួល ៗ ក្នុងវត្តនេះមានលោកចេះបាលី ១ អង្គ ឈ្មោះអ.ចារ្យ រាជ កាលរៀនសូត្រនៅក្រុងភ្នំពេញ ៗ ចាងហ្វាងព្រះរាជបណ្ណាល័យសួររួចហើយ ក៏ប្រគេនសៀវភៅនិងរូបថតពុទ្ធ ដល់លោកអធិការវត្តរួចត្រឡប់ពីលើកុដិទៅមើលវិហារ វិហារនេះគ្រាន់បើដែរបន្ទាប់បន្សំគ្នានឹងវិហារវត្តកំពង់ធំ លុះមើលរួចហើយក៏ត្រឡប់មកវត្តកំពង់ដូង ឬផ្សារដូង ( យួនហៅ ដួហ៊ីវឹ ) កាលដែលមកដល់វត្តនេះឃើញមានរបៀបរៀបទទួលទង់ជ័យ និងលេងភ្លេងសៀម ១ វង់ ព្រមទាំងមានតុកៅអីផង ៗ លោកចៅអធិការវត្តនេះនាម ហៀង មានទីជាឧបជ្ឈាយ៍ដែរ ក្នុងពេលដែល[illegible]ទៅក្នុ[illegible]យជួបជុំគ្នាក្នុងទីដែលរៀបទទួលនោះ ខ្ញុំចំណាំបានលោក

អាចារ្យ ១ អង្គឈ្មោះ លឿក លោកអាចារ្យនេះកាលរៀនបាលីនៅ ។ ភ្នំពេញបានធ្វើជាសមុហលោកគ្រូសិរីសម្មតិវង្ស នេត្រ ក្នុងវត្តឧណ្ណាលោម ក្រុងភ្នំពេញ ។ ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរពីចំនួនភិក្ខុសាមណេរ ជាដើមដូចក្នុងវត្តកញ្ចាង លោកគ្រូវត្តនេះក៏ឆ្លើយដូចគ្នានឹងឧបជ្ឈាយ៍វត្ត កញ្ចាងដែរ ថាមិនត្រូវការចង់ឲ្យមានសាលារៀន ឲ្យមានគ្រូបង្រៀន ទេ ព្រោះវត្តនេះឧបាសកជើងវត្តតិចស្ដួចស្ដើងណាស់ ចាងហ្វាងព្រះរាជ បណ្ណាល័យសួរទៅលោកសមុហ លឿក ថា ត្រូវការចង់ចូលរៀនទៀតឯ សាលាបាលីទេ ? លោកសមុហ លឿក ឆ្លើយថាមិនត្រូវការទេ បើប្រសិន ជាត្រូវការចង់រៀនក្នុងសាលាបាលីនោះ កាលនៅឯភ្នំពេញស្រាប់នោះ ចូលរៀនទីនេះទៅហើយ ។ លុះសួររួចហើយបានប្រគេនសៀវភៅនិងរូប ផ្ដិតពុម្ពដល់លោកចៅអធិការវត្ត រួចចូលទៅមើលវិហារ ហើយត្រឡប់មក ទីកន្លែងដែលសំណាក់វិញ ។

ដល់ម៉ោង ១ ឯរសៀលចេញទៅម្ដងទៀត ទៅម្ដងនេះ លោកគ្រូ សិរីសុទ្ធិវង្ស វត្តកំពង់ធំក៏ជូនទៅដែរ រួមជា ៤ នាក់ ទៅនោះជកប ដល់ផុតខែត្រត្រាវិញ ដោយចាងហ្វាងព្រះរាជបណ្ណាល័យ កាលដែល ចេញពីព្រៃនគរទៅ ខែត្រត្រាវិញ នៅ ២៨ គីឡូម៉ែត្រទៀតដល់ ទៅត្រាវិញ ក៏ឃើញវត្ត ១ ដាច់តែឯង ហើយចំណាំថានឹងចូលមកមើល វត្តនេះ លុះដល់វេលាដែលចេញមកមើលវត្ត ត្រូវតាមផ្លូវដែលទៅ

នោះក៏បង្ហួសមកចូលវត្តនោះឯង ឈ្មោះថាវត្តកំពង់លេម នៅក្នុងខែត្រ វិញឡុង យួនហៅថា យិញឡុង ខ្មែរហៅ ឡុងហោ ក្នុងខែត្រ វិញឡុងនេះមានតែវត្ត ១ ប៉ុណ្ណោះ វត្តនេះជាវត្តតូចស្តួចស្តើង ព្រោះជាតិខ្មែរជាចំណុះជើងវត្ត មានតិច មានច្រើនតែពួកយួន ៗ ចាំងហ្វាងព្រះរាជបណ្ណាល័យបានសួរជួបវត្តឯទៀត ហើយបានប្រគេនសៀវភៅបរកវសូត្រ ១ សៀវភៅដែលសរសើរគុណលោកគ្រូព្រះ មហាវិមលធម្ម ១ និងរូបផ្តិតពុម្ព ៤ សន្លឹក រួចត្រឡប់មកវិញចូលមកក្នុងខែត្រត្រាវិញ ឈៀងចូលទៅវត្តពីសី វត្តនេះយួនហៅថាវត្តបាស៊ី ក្នុងឃុំកៀងថាន់ កាលទៅដល់បានឃើញ លោកសង្ឃនិងឧបាសក ឧបាសិកាជាច្រើនចេញមកទទួលដល់ទ្វាររបងវត្ត ព្រមទាំងលេងភ្លេងសៀម និងអុជធូបទទួល ហើយបានឃើញលោកសង្ឃសុទ្ធតែស្លៀកពាក់ស្បង់ចីពរបរិមណ្ឌលល្អ ខ្ញុំក៏នឹកថាវត្តនេះប្រហែលជាមានការរៀនសូត្រច្រើន លុះក្រឡេកមើលទៅក៏ឃើញលោកគ្រូអរិយធម្ម ពុំទីព ជាគណៈ នៅវត្តឧណ្ណាលោមក្រុងភ្នំពេញ មកក្នុងពួកលោកសង្ឃទាំងនោះដែរ លុះសួរទៅលោកអរិយធម្ម ៗ ប្រាប់ថាវត្តនេះជាវត្តលោកធ្លាប់នៅពីដើម សព្វថ្ងៃនេះមានលោក ១ អង្គឈ្មោះ ជង់ ជាប្អូនលោកធ្វើជាអាចារ្យបង្រៀននៅវត្តនេះ ៗ ហើយយើងបានចូលទៅអង្គុយជួបជុំក្នុងទីសាលា ទើបចាំង-ហ្វាងព្រះរាជបណ្ណាល័យ បានសួរជួបវត្តឯទៀត នោះលោកចៅអធិការនាម ខ្មៅ និងលោកអាចារ្យ ជង់ អាចារ្យ ចក្ក-តាំង ២ ឆ្លើយថា

ក្នុងវត្តសព្វថ្ងៃមានបង្រៀន អក្សរខ្មែរ អក្សរសៀម និង បង្រៀនធម៌វិន័យ តែត្រូវការចង់សុំឲ្យមានគ្រូបង្រៀន ១ ទៀត មកពីភ្នំពេញ ជាគ្រូលោកសង្ឃ ដើម្បីនឹងបានបង្រៀនអក្សរខ្មែរ អក្សរបារាំង និងបាលីខ្លះផងថែមទៀត វត្តនេះឃើញថាមានត្រូវការចង់ឲ្យមានការបង្ហាត់ បង្រៀនច្រើន ដោយសេចក្តីស្រឡាញ់ចូលចិត្តខាងការចេះដឹងច្រើន ព្រោះគេបានសង់សាលា ១ ដោយឥដ្ឋ ហើយបានបង្រៀនធម៌វិន័យក្នុងសាលានោះ មកជាយូរឆ្នាំហើយដល់មកក្នុងសម័យនេះ ក៏នៅតែត្រូវការសុំបន្ថែមឲ្យមានគ្រូមកបង្រៀនថែមទៀត ហើយមាននិយាយថា សូមប្រគល់វត្តទាំងមូលឲ្យ សូមឲ្យជួយរៀបចំយ៉ាងណា ដែលនាំឲ្យមានសេចក្តីចម្រើនខាងផ្លូវពុទ្ធសាសនា នោះយើងទាំងអស់គ្នាចេះតែប្រតិបត្តិធ្វើតាម ហើយសម្តែងសេចក្តីរាប់អានដូចជាធ្លាប់បានស្គាល់ ធ្លាប់បានជាមិត្តនឹងគ្នាមកយូរហើយ ចាងហ្វាងព្រះរាជបណ្ណាល័យ ក៏ពេញចិត្តជាច្រើននឹងវត្តនេះ ហើយបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ព ហើយចូលទៅមើលវិហារ ។ រួចក៏ចេញពីវត្តពីសីនោះ ចំពោះទៅវត្តសំពេង ក្នុងឃុំធៀកព៉ត ខ័ណ្ឌត្រាកូ ។ កាលដែលទៅដល់វត្តសំពេង បានឃើញលោកអធិការវត្តនេះ នាម គង់ និងឧបាសកជើងវត្តរៀបចំធ្វើបដិសណ្ឋារៈទទួលដោយការគួរសមក្នុងទីសាលាវត្ត ហើយបានចូលទៅជួបជុំក្នុងទីសាលានោះ ហើយបានសួរដូចវត្តឯទៀត ៗ ក្នុងទីដែលជួបជុំនោះមានលោកគ្រូឧបជ្ឈាយ៍នៅវត្ត អង្គ និងលោកអធិការវត្តឯទៀតខ្លះក៏និមន្តមកជួបជុំក្នុងទីនោះដែរ បានឆ្លើយថា

ត្រូវការពត់ឲ្យមានសាលារៀននិងគ្រូបង្រៀនក្នុងវត្តសំពេងនេះ លុះរួចការ ប្រជុំនេះហើយ ចាងហ្វាងព្រះរាជបណ្ណាល័យ បានប្រគេនសៀវភៅនិង រូបផ្តិតពុម្ពដល់លោកចៅអធិការគ្រប់វត្ត រួចហើយលោកគ្រូឧបជ្ឈាយ៍វត្ត អង្គ លោកបានអញ្ជើញឲ្យចូលទៅវត្តលោកផង តែមិនបានទៅព្រោះ ពេលតិច ក្រែងមិនអាចនឹងចូលទៅវត្តឯទៀតៗ ដែលមានក្នុងប្រូក្រាម កំណត់ឲ្យចូលមើលថ្ងៃនោះ គួរអាណិតដល់លោកគ្រូវត្តអង្គពេក ព្រោះ លោកចាស់ជរាណាស់ហើយ ៗ លោកមានសេចក្តីរាប់អានច្រើន បាន អញ្ជើញចាងហ្វាងព្រះរាជបណ្ណាល័យក្នុងវេលានោះម្តង ដល់ថ្ងៃស្អែកឡើង បានអញ្ជើញម្តងទៀតឯកំពង់ធំ ចាងហ្វាងព្រះរាជបណ្ណាល័យក៏នឹកស្តាយ ពេក ដោយពេលតិចមិនអាចនឹងទៀតពេលចូលទៅបានឡើយ តែនឹកបំ-ណងថា ជាន់ក្រោយនឹងចូលទៅវត្តអង្គឲ្យបាន លុះត្រឡប់ពីវត្តសំពេង បានចូលទៅវត្តយៀន ក្នុងឃុំតាំងមី ខ័ណ្ឌត្រាញីវ កាលចូលទៅដល់ទី វត្ត ឃើញស្អាតឈឹង ហើយបានឡើងទៅលើកុដិលោកអធិការនាម សេង ឃើញលោកសង្ឃ ៤-៥អង្គ ចាងហ្វាងព្រះរាជបណ្ណាល័យ មិនឃើញ មានអ្វីនឹងអង្គុយ ក៏ចេញមកអង្គុយលើក្បាលជណ្តើរខាងក្រៅ ចំណែក លោកសង្ឃមានលោកអធិការជាដើម ឈរពីខាងក្នុងកុដិ ទើបចាងហ្វាង ព្រះរាជបណ្ណាល័យ បានសួរដូចវត្តឯទៀត ហើយប្រគេនសៀវភៅនិងរូប ផ្តិតពុម្ពខ្លះ រួចត្រឡប់មកពីវត្តយៀននោះមកវិញ ចូលវត្តកំពង់ជ្រៃ ឃុំមី

កៀង ខ័ណ្ឌតាញ៉ីរងៀង កាលចូលទៅដល់មានគេប្រាប់ថា ក្នុងវត្តនេះ មានលោកពីរពួកដូចជាអធិការពីរ ១ ពួកខាងជើង ១ ពួកខាងត្បូង ទាំងពីរពួកនេះបានជាមិនចុះសាមគ្គីនឹងគ្នា ព្រោះពួកខាងជើងជាសិស្សនៃឧបជ្ឈាយ៍វត្តថ្កទល់ ពួកខាងត្បូងជាសិស្សនៃឧបជ្ឈាយ៍វត្តឯទៀត គឺសុទ្ធតែមានទីពឹងទីពំនាក់កល់ ៗ ខ្លួន ហេតុនេះជាដើមហើយ ដែលបណ្ដាលនាំឲ្យលោកក្នុងវត្តនេះបែកគ្នាជាពីរពួក ។ កាលដែលយើងបានចូលទៅដល់ឃើញលោកពួកខាងជើងចុះមកទទួល ឯលោកពួកខាងត្បូងមិនចុះមកប្រួមជាមួយគ្នាទេ ប៉ុន្តែចាងហ្វាងព្រះរាជបណ្ណាល័យ មានអធ្យាស្រ័យចង់ឲ្យលោកទាំងពីរពួកនិមន្តប្រួមជាមួយគ្នា ទើបឲ្យគេនិមន្តលោកពួកខាងត្បូងមកជួបជុំជាមួយគ្នានឹងកុដិលោកពួកខាងជើង ហើយបានសួរដូចវត្តឯទៀត រួចបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ព រួចចេញពីវត្តកំពង់ជ្រៃ ចូលទៅវត្តថ្កទល់ ក្នុងឃុំកៀងថាច់ ខ័ណ្ឌតាញ៉ីរងៀង ។ កាលចូលទៅវត្តថ្កទល់នេះ ឃើញស្ងាត់ឈឹង ចាងហ្វាងព្រះរាជបណ្ណាល័យក៏មិនបានចុះពីរថយន្ត ព្រោះសួរទៅដឹងថា លោកអធិការនាម អិន ដែលជាឧបជ្ឈាយ៍វត្តនេះ និមន្តចេញទៅឯណាបាត់ទៅហើយ គ្រាន់តែសួរលោកគ្រូសូត្រពីចំនួនភិក្ខុ-សាមណេរនិងក្មេង ហើយផ្ញើរូបផ្តិតពុម្ពទុកឲ្យប្រគេនលោកអធិការរួចត្រឡប់មកវិញ ដល់មកកន្លែងដែលសំណាក់ដើមនៅវេលាម៉ោង ៦ ល្ងាច ។

# ថ្ងៃ ២១ខែយ៉ាំងវីយេ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹក ចេញទៅមួងទៀត ចំពោះទៅវត្តជូរប្អូនហៅ ត្រាកូ ក្នុងឃុំជិញឈៀង ខណ្ឌអ៊ាយក៉ាធៀង កាលទៅដល់វត្តនេះ បានឃើញលោកចៅអធិការនាម ប៉ែន ព្រមទាំងឧបាសកទាយករៀបចំធ្វើ បដិសណ្ឋារ ទទួលដោយការគួរសមក្នុងទីសាលា ១ មានរៀបតុកៅអីព្រម ទាំងមានកំរាលពីលើតុ ហើយរៀបតាក់តែងជាចម្លែក គឺយកដបតូលែន រៀបបន្តុបលើគ្នា ជាជួរជាសន្លាក់ដូចគេរៀបលក់ ព្រមទាំងដបលីមូណាត់ និងសារូជាច្រើន លុះជួបជុំគ្នាក្នុងទីសាលានោះហើយ បានហៅព្រះរាជ បណ្ណាល័យបានសួរដូចវត្តឯទៀត រួចបានប្រគេនសៀវភៅនិងរូបផ្តិតពុម្ព ហើយឡើងទៅមើលវិហារ រួចត្រឡប់ពីវត្តជូរបត់ទៅវត្តចេតិយក្នុងឃុំនីរ-សើង ខណ្ឌអ៊ាយក៉ាធៀង កាលទៅដល់បានឃើញលោកអធិការនាម កែវ ព្រមទាំងបណ្តាពស្ត្រដើងវត្តនេះបានធ្វើបដិសណ្ឋារ ជាការស្រួលបួល ណាស់ដែរ នៅក្នុងទីសាលាមានជួបជុំលោកសង្ឃនិងឧបាសកជាច្រើន រូប ហើយបានហៅព្រះរាជបណ្ណាល័យបានសួរដូចវត្តឯទៀត ហើយ បានប្រគេនសៀវភៅ និងរូបផ្តិតពុម្ព រួចឡើងទៅមើលវិហារ ហើយ ត្រឡប់មកវិញបត់តាមផ្លូវ ១ ផ្សេងតម្រង់ត្រង់ទៅវត្តកាសិត ក្នុងឃុំហ្វាយ ឡុង ខណ្ឌអ៊ាយក៉ាទ្រេង លោកអធិការវត្តនេះនាមឡៀង ។ កាលទៅ ដល់វត្តនេះវេលាម៉ោង ១១ព្រឹក កាលមុននឹងទៅដល់វត្តនេះគឺទើបនឹងដល់

ទៅផ្លូវបត់ ឃើញមនុស្សម្នាក់ជាបំរើលោកចៅហ្វាយខណ្ឌ គើវ មានងារកិត្តិយសជាចៅហ្វាយស្រុក ជាធំក្នុងខណ្ឌនេះ បាននាំយកកាតនាម ( កាតវិស៊ិត ) របស់លោកចៅហ្វាយខណ្ឌ គើវ ១ សន្លឹកមកចាំទៅដើមផ្លូវ សេចក្ដីសរសេរថែមក្នុងកាតនាមនោះថា សូមអញ្ជើញ ម៉ាដឺម្វូអាហ្ស៊ែល សូមនិមន្តព្រះតេជព្រះគុណចូលទៅវត្តកាសិតក្នុងខណ្ឌខ្ញុំព្រះករុណាជាមុន ហើយសឹមអញ្ជើញ សឹមនិមន្តទៅវត្តឯទៀត ៗ ជាក្រោយ តែការដែលទៅនេះក៏ពុំបានសម្រេចតាមសេចក្ដីនិមន្ត ឡើយ ព្រោះអ្នកនាំសំបុត្រនោះយូរបន្តិច ដំណើរដែលអស់យើងទៅនោះ ដោយរថយន្តហោសហួសទៅវត្តឯទៀតៗ មុន លុះដល់ត្រឡប់មកវិញទើបឃើញសំបុត្រ ហើយឲ្យអ្នកនាំសំបុត្រឡើងរថយន្តជាមួយគ្នាទៅ នៅចំនួនតែជាង ១០០ ម៉ែត្រទៀតទឹងដល់ទៅវត្តកាសិត ក៏ដល់ទៅផ្ទះលោកចៅហ្វាយ ខណ្ឌ គើវ ៗ ក៏ចេញមកទទួល ហើយសូមអញ្ជើញបាងហ្វាងព្រះរាជបណ្ណាល័យ ទឹងសូមនិមន្តខ្ញុំឲ្យចូលទៅក្នុងផ្ទះជាមុន ហើយសឹមឲ្យហួសទៅវត្ត តែបាងហ្វាងព្រះរាជបណ្ណាល័យ ឃើញថាពេលជិតថ្ងៃត្រង់ហើយ ចង់ឲ្យខ្លួនខ្ញុំទៅទទួលចង្ហាន់ឯវត្ត ដល់រួចការហើយសឹមត្រឡប់មកវិញទឹងចូលផ្ទះលោកចៅហ្វាយខណ្ឌ គើវ ជាក្រោយ ទើបបង្ហួសទៅឯវត្តកាសិត កាលដែលទៅដល់នោះបានឃើញលោកសង្ឃទឹងឧបាសកជាច្រើននៅចាំទទួល អញ្ជើញឲ្យឡើងទៅលើសាលាដែលជាទីរៀបចំទទួល ហើយក៏ធ្វើបដិសណ្ឋារៈប្រាស្រ័យដោយពាក់ទាក់ ហើយក៏សោយទៅ

វិញដោយដល់ពេលអាហារ ៗ លុះដល់ផុតពេលអាហារហើយក៏មកប្រជុំគ្នាលើទីសាលា មានព្រះសង្ឃចំនួន ១៩ វត្តដែលនៅក្នុងខណ្ឌនេះមកជួបជុំព្រមគ្នា ថែមវត្តជ្រោយទន្សាយ ១ ទៀត ជា ២០ វត្ត ឯជ្រោយទន្សាយនៅក្នុងខណ្ឌផ្សេងទេ តែបានជាមកឲ្យជួបជុំក្នុងវត្តនេះព្រោះថាមានសេចក្តីយល់ឃើញនិងសេចក្តីប្រតិបត្តិ តាមផ្លូវពុទ្ធសាសនាត្រូវគ្នា តែដែលមកនេះលោកអធិការមិនបានមកទេ គឺលោកអាចារ្យ លក្ខណ៍ មកជំនួស ៗ

ឯវត្តទាំង ១៩ នោះគឺ ១ វត្តកាសិត ២ វត្តឃ្លាបាង ៣ វត្តជ្រៃគោក ៤ វត្តរំដួល ៥ វត្តតាកាំ ៦ វត្តដំបងពាក់ ៧ វត្តជ្រោយប្រាសាទ ៨ វត្តបាយាម ៩ វត្តឫស្សីគុម្ព ១០ វត្តព្រះប្រាង្គណ៍ ១១ វត្តកំពង់សាលា ១២ វត្តព្រៃល្វី ១៣ វត្តផ្ទារព្រាល ១៤ វត្តទ្រព្រះបាទ ១៥ វត្តផ្ទារទំពួង ១៦ វត្តផ្ទារអណ្តូង ១៧ វត្តកោះទន្ទាប់ ១៨ វត្តបាត្រាប ១៩ វត្តក្បាលទូកជា ២០ វត្តជ្រោយទន្សាយ ៗ កាលដែលជួបជុំគ្នាហើយចាងហ្វាងព្រះរាជបណ្ណាល័យបានសួរលោកគ្រប់វត្តពីចំនួនភិក្ខុ សាមណេរ ក្មេងនិងសួរពីកិច្ចការរៀនសូត្រក្នុងវត្ត ដូចសេចក្តីសួរក្នុងវត្តឯទៀតមុន ៗ លោកទាំងអស់នោះក៏ឆ្លើយប្រាប់ពីចំនួនភិក្ខុ សាមណេរ ក្មេង ហើយឆ្លើយថាត្រូវការចង់បានគ្រូបង្រៀនស្មើរតែគ្រប់វត្ត ដើម្បីឲ្យបានបង្រៀនអក្សរខ្មែរ បាលី ធម៌វិន័យនិងភាសាបារាំងសែសផង លោកសង្ឃទាំងប៉ុន្មានវត្ត ដែលនៅក្នុងខណ្ឌឆ៉ាយ"ត្រង់នេះមាន វត្តកាសិតនិងវត្តកំពង់សាលាជាដើម តាមដែលសង្កេត

មើលទៅឃើញថាមានអធ្យាស្រ័យស្រឡាញ់ នឹងការរៀនសូត្រច្រើនគ្រាន់បើជាងលោកសង្ឃដែលនៅខណ្ឌឯទៀតៗ តាមដែលបានដឹងថា ព្រោះចៅហ្វាយខណ្ឌនេះជាតិជាខ្មែរ ហើយជាអ្នកយកចិត្តទុកដាក់ ជួយឧបត្ថម្ភទំនុកបម្រុងព្រះពុទ្ធសាសនាដោយមាំមួនណាស់ ហើយមានចិត្តជ្រះថ្លានឹងព្រះសង្ឃដែលជាអ្នករៀនសូត្រនោះផង ម្ល៉ោះហើយព្រះសង្ឃក្នុងខណ្ឌនេះ ក៏ត្រឡប់មានចិត្តប្រតិបត្តិល្អបានដោយច្រើន ដោយអំណាចលោកចៅហ្វាយខណ្ឌ គើរ នេះ ឯចៅហ្វាយខណ្ឌក្នុងខណ្ឌឯទៀតៗ ក្នុងខែត្រត្រាវិញនេះសុទ្ធតែជាជាតិយួនទាំងអស់ គេមិនត្រូវការនឹងទំនុកបម្រុងព្រះពុទ្ធសាសនាឡើយ ម្ល៉ោះហើយលោកសង្ឃក្នុងខណ្ឌទាំងនោះ ក៏មិនសូវមានកម្លាំងនឹងរៀនសូត្រ ។

កាលដែលចាងហ្វាងព្រះរាជបណ្ណាល័យបានសួរហើយ ក៏បានកត់តាមចម្លើយ ដែលលោកគ្រប់វត្តឆ្លើយ រួចបានប្រគេនសៀវភៅនិងរូបថតពុម្ពដល់លោកអធិការគ្រប់វត្ត ៗ លុះរួចកិច្ចក្នុងវត្តហើយ ក៏ត្រឡប់ចេញមកចូលផ្ទះលោកចៅហ្វាយខណ្ឌគើរ ព្រះសង្ឃគ្រប់វត្តនិមន្តមកជួបជុំនៅទីផ្ទះនោះទៀត ។ ក្នុងឱកាសដែលជួបជុំនោះ លោកចៅហ្វាយខណ្ឌ គើរ បាននិយាយចំពោះមុខ ចាងហ្វាងព្រះរាជបណ្ណាល័យថា ម៉ាដឹមូ-អាហ្ស៊ែល ខ្ញុំមានអំណរដោយក្រៃលែង ដែលម៉ាដឹមូអាហ្ស៊ែលបានអញ្ជើញមកក្នុងស្រុកយើង ហើយបានជួយទំនុកបម្រុងផ្លូវព្រះពុទ្ធសាសនា

ក្នុងស្រុកយើង ដើម្បីនឹងឲ្យបានចម្រើនរុងរឿងឡើង ព្រោះខ្លួនខ្ញុំក៏ជាអ្នកទំនុកបម្រុងព្រះពុទ្ធសាសនាដែរ ខ្ញុំបានដឹងយូរថ្ងៃហើយថា ម៉ាដឹមូអាហ៊ែ្យលនឹងអញ្ជើញមក ខ្ញុំក៏មានសេចក្តីត្រេកអរនឹងសេចក្តីពេញចិត្តទុកតាំងពីថ្ងៃមុន ឥឡូវថ្ងៃនេះ ម៉ាដឹមូអាហ៊ែ្យល បានអញ្ជើញមកដល់ ខ្ញុំក៏រឹងរឹតតែមានសេចក្តីត្រេកអរទ្វេរឡើងទៀត ខ្ញុំសូមជូនពរ សូមឲ្យម៉ាដឹមូអាហ៊ែ្យលមានអាយុវែង និងបានជួយទំនុកបម្រុងព្រះពុទ្ធសាសនាតទៅ ” ហើយត្រឡប់បែរមកនិយាយនឹងខ្ញុំទៀតថា “ ព្រះតេជព្រះគុណបាននិមន្តមកជួយរំលឹកដាស់តឿន ដើម្បីឲ្យព្រះពុទ្ធសាសនាក្នុងទីនេះបានលូតលាស់ដុះឡើង សូមព្រះតេជព្រះគុណនៅឲ្យបានសេចក្តីសុខ សេចក្តីចម្រើនតរៀងទៅ ” ។ ទើបចាងហ្វាងព្រះរាជបណ្ណាល័យបាននិយាយតបទៅវិញថា “ លោកចៅហ្វាយខណ្ឌ ចំណែកខាងខ្ញុំដែលមកនេះ បានឃើញលោកចៅហ្វាយខណ្ឌយកចិត្តទុកដាក់ ក្នុងការដែលនាំឲ្យព្រះពុទ្ធសាសនាបានចម្រើនឡើង ខ្ញុំក៏មានសេចក្តីត្រេកអរក្រៃពេកណាស់ សូមឲ្យលោកបានតម្កល់នៅក្នុងសេចក្តីសុខ សេចក្តីចម្រើនតទៅ ។ ម្យ៉ាងទៀតសូមឲ្យលោកយកចិត្តទុកដាក់ជួយផ្សាយសៀវភៅធម៌អាថ៌ព្រះពុទ្ធសាសនា ឲ្យបានផ្សាយសព្វក្នុងដំបន់នេះ ដើម្បីនឹងឲ្យអ្នកដែលកាន់ព្រះពុទ្ធសាសនាបានរៀនសូត្រចេះដឹង ហើយនឹងបានប្រតិបត្តិឲ្យត្រឹមត្រូវតាមគន្លងព្រះពុទ្ធសាសនា ។ ក៏នឹងចម្រើនឡើងដោយលំដាប់ ។

លុះរួចហើយក៏លាព្រះភិក្ខុសង្ឃ និងលោកចៅហ្វាយខណ្ឌ គើរ ចេញពីនោះមកនៅវេលាម៉ោង ១ រសៀល ត្រឡប់ទៅតាមផ្លូវ ១ ផ្សេង បំពោះទៅវត្តផ្ទោរកំង ក្នុងឃុំ ឡុង ស៊ឹង ខណ្ឌ យិញឡឹយ កាលចូលទៅដល់វត្តនេះ បានដឹងថាលោកអធិការវត្តនេះ និមន្តទៅឯវត្តកោះសោម ហើយ បម្រុងនឹងជួបជុំនៅវត្តកោះសោមទើបបានហ្វាងព្រះរាជបណ្ណាល័យ បានសួរលោកគ្រូសូត្រវត្តនោះដូចវត្តឯទៀត ហើយផ្ញើសៀវភៅនឹងរូបផ្តិតពុម្ពទុកឲ្យប្រគេនលោកអធិការ រួចត្រឡប់មកវិញ ដល់មកផ្លូវ ១ ដែលបត់ចូលទៅវត្តកោះសោម ផ្លូវនោះរថយន្តចូលទៅមិនបាន ទៅបានតែដោយជើងទេ ៗ យើងមានសេចក្តីត្រូវការនឹងចង់ចូលទៅវត្ត កោះសោមដោយក្រៃពេក ព្រោះបានដឹងថាវត្តកោះសោមនោះជាវត្តធំមាំមួនជាងវត្តឯទៀត ប៉ុន្តែនឹងបង្ខំចូលទៅដោយរថយន្តមិនរួចនឹងចុះដើរ ក្រែងយូរពេកក្រែងត្រឡប់មកមិនទាន់ ពេលដែលមានប្រជុំធំនៅក្នុងវត្តកំពង់ធំ ហេតុនោះអស់យើងក៏ខំកាត់ចិត្តបង្ហួសវត្ត កោះសោម ត្រឡប់មកកាន់ទីសំណាក់ដើមវិញ ។

នៅវេលាម៉ោង ៦ ល្ងាច ជួបជុំនៅក្នុងវិហារវត្តកំពង់ធំ ក្នុងឱកាសដែលជួបជុំនោះ លោក ឡាត់មីនិស្ត្រាទ័រ នៅត្រាវិញក៏បានអញ្ជើញមកជួបជុំជាមួយនឹងបានហ្វាងព្រះរាជបណ្ណាល័យ និង លោកសង្ឃចំនួន ៤០ វត្ត ឯវត្តទាំង ៤០ នោះ ខ្ញុំមិនចាំឈ្មោះទាំងអស់ ព្រោះនៅវេលានោះ

មានពេលខ្ញុំណាស់មិនអាចនឹងសួរឈ្មោះវត្តហើយកត់ទុកបាន តែចំណាំបានខ្លះ គឺវត្ត ឈឿន វត្តទល់ វត្តអង្គ វត្តពិសី និង វត្តកាសិត វត្តជ្រោយទន្សាជាដើម ១ អន្ទើ និង ឧបាសកស្រី-ប្រុស ប្រហែលចំនួន ២០០ នាក់ មានលោកចៅហ្វាយខណ្ឌ កើរ ជាដើម ដែលបានជួបពីមុនរួចហើយនោះ ក៏បានមកកាន់ទីប្រជុំនេះខ្លះទៀតជាច្រើន ។ នៅវេលាដែលបានជួបជុំនោះ ចាងហ្វាងព្រះរាជបណ្ណាល័យ បានឲ្យខ្ញុំអធិប្បាយពន្យល់ពីព្រះពុទ្ធសាសនា ដែលផ្សាយចូលមកក្នុងស្រុកកម្ពុជា ជាដំបូង រហូតដល់មកសព្វថ្ងៃនេះ ដែលរាជការទំនុកបម្រុងព្រះពុទ្ធសាសនាខាងដែនកម្ពុជា បានបង្កើតឲ្យមានសាលាបាលីនិង ព្រះរាជបណ្ណាល័យ រហូតដល់មកកិច្ចដែលរាជការបានអនុញ្ញាតឲ្យមានដំណើរមកក្នុងដែនកូសាំងស៊ីន ចំណុះខេត្តដែលមានព្រះពុទ្ធសាសនា ដោយរាជការខាងដែនកូសាំងស៊ីនមានប្រាថ្នានឹងបង្កើតឲ្យមានសាលាបង្រៀនក្នុងវត្ត សម្រាប់បង្រៀនវិជ្ជាខាងខ្មែរនឹងព្រះពុទ្ធសាសនា ខ្ញុំក៏បានអធិប្បាយតាមសេចក្ដីខាងលើជាសេចក្ដីខ្លីៗល្មមតែស្ដាប់បាន លុះអធិប្បាយរួចហើយ ទើបលោកសង្ឃនិងឧបាសកដែលស្ដាប់បាន ក៏មានចិត្តជឿនឹងរីករាយគ្រប់គ្នាក្នុងពេលនោះឯង មានលោកសង្ឃវត្តខ្លះសុំបង្កើតឲ្យមានសាលាឲ្យមានគ្រូបង្រៀន ចាងហ្វាងព្រះរាជបណ្ណាល័យក៏បានសេចក្ដីត្រេកអរ ចំពោះទៅកាន់លោកសង្ឃ និងឧបាសក ដោយសេចក្ដីសមគួរ លុះរួចកិច្ចប្រជុំនេះហើយ លោកសង្ឃ

និងឧបាសកទាំងអស់ ក៏ត្រឡប់ទៅកាន់ទីលំនៅ នៃខ្លួនវិញទៅ ។

ក្នុងវេលាយប់នោះ ខ្ញុំបាទទៅនិយាយសន្ទនានឹងលោកគ្រូសិរិវិសុទ្ធិវង្ស លី ជាធំក្នុងវត្តកំពង់ធំ បាទសួរលោកពីព្រះពុទ្ធសាសនាដែលមាននៅក្នុងស្រុកកូសាំងស៊ីននេះ លោកក៏បាននិយាយប្រាប់រឿង ១ ជារឿងគួរឲ្យចង់ស្តាប់ ។ ហើយនឹងកើតសេចក្តីស្ញើច សេចក្តីអស្ចារ្យក្នុងចិត្ត ។ រឿងដែលលោកនិយាយប្រាប់ដូច្នេះថា ៖

កាលស្រុកកូសាំងស៊ីននេះ នៅជារបស់ខ្មែរនៅឡើយ កាលនោះក្សត្រិយ៍ក្នុងព្រះនាមអង្គ ម៉ី ជាព្រះរាជបុត្រីព្រះបាទអង្គ ចន្ទ បានសោយរាជ្យគ្រប់គ្រងផែនដីខ្មែរ ក្នុងរាជនោះមានយួនឈ្មោះ ង្វៀង មិញ-យ៉ាង ជាសេនាបតីធំរបស់យួន លើកកងទ័ពមកបង្ក្រាបដណ្តើមយកទឹកដីខ្មែរ ស្តេចអង្គ ម៉ី ក៏អប្បរាជ័យចាញ់ទ័ពយួន ។ ដណ្តើមយកបានទឹកដីព្រៃនគរ មីថរ ឡុងហោ ផ្សារដែក បាសាក់ ព្រះត្រពាំង ។

ព្រះអង្គ ម៉ី សោយរាជ្យបានតែ ៣ ឆ្នាំក៏ទិវង្គតទៅ ក្រោយនោះពួកយួនមានគំនិតបំផ្លិចបំផ្លាញព្រះពុទ្ធសាសនា បង្គាប់ឲ្យពួកលោកសង្ឃខ្មែរ ស្លៀកពាក់ដូចជាលោកសង្ឃយួន ក្នុងសម័យនោះ មានចៅហ្វាយស្រុកខ្មែរម្នាក់ឈ្មោះ គុយ ជាអ្នកប្រួតប្រា ក្នុងខែត្រនេះ តែនៅក្នុងអំណាចយួន ក៏ដោយចិត្តគេតតាស់ ដោយយួនបំផ្លាញព្រះពុទ្ធសាសនា ព្រមទាំងបំបាត់ភាសាខ្មែរដូច្នេះ ចៅហ្វាយស្រុក គុយ

កំនិករឮកដល់គុណព្រះពុទ្ធសាសនា ហើយក៏កើតសេចក្ដីជ្រះថ្លាដ៏មាន
កម្លាំង អាចហ៊ានផ្ដូរជីវិតអាត្មានឹងព្រះពុទ្ធសាសនា ទើបចូលទៅនិយាយ
នឹងពួកអ្នកពជការយួន ថាជាតិខ្មែរដែលកាន់ព្រះពុទ្ធសាសនា ហើយលះ
ទ្រព្យសម្បត្តិប្រពន្ធកូនមកបួស កាន់ភេទជាសមណៈនេះ ត្រូវតែស្លៀក
ស្បង់ពាក់ចីពរតាមបែបនេះ ទើបហៅថាអ្នកបួសដោយត្រឹមត្រូវ មិន
ត្រូវឲ្យស្លៀកខោពាក់អាវដូច្នេះទេ ៗ ពួកយួនមិនស្ដាប់ចេះតែបង្ខំញាំញី
បៀតបៀន ឲ្យស្លៀកខោពាក់អាវ ដូចលោកសង្ឃយួន ចៅហ្វាយស្រុក
កុយ ក៏យកជីវិតផ្ដូរនឹងព្រះពុទ្ធសាសនា ហើយចូលទៅនិយាយនឹងពជ
ការយួនទៀតថា ខ្ញុំសូមឲ្យភេទអ្នកបួសនិងកិច្ចពុទ្ធសាសនា តាំងនៅ
ក្នុងស្រុកនេះដូចដើម ហើយសូមឲ្យពជការយួនសម្លាប់ខ្លួនខ្ញុំចុះ ៗ ពជការ
យួនក៏ព្រមសន្យាទុកភេទអ្នកបួសនិងកិច្ចសាសនាឲ្យ ហើយក៏ប្រហារជីវិត
ចៅហ្វាយស្រុក កុយ នោះទៅ គ្រាដែលពជការយួន សម្លាប់ចៅ
ហ្វាយស្រុក កុយនោះ ក៏កើតអស្ចារ្យដ៏ធំភ្លៀងធ្លាក់អស់ ៧ យប់
៧ ថ្ងៃ ៗ ក្រោយនោះបណ្ដាជនជាតិខ្មែរទាំងឡាយ ក៏នាំគ្នាលើកសព
ធ្វើបុណ្យឈាបនកិច្ចស្រេចហើយ បានសាងចេតិយ ១ នៅក្នុងវត្តកំពង់
ធំខាងជ្រុងឦសានវិហារ ហើយបញ្ចុះធាតុចៅហ្វាយស្រុកកុយ ក្នុង
ចេតិយនោះ តាំងពីកាលនោះរៀងមកដល់ឥឡូវនេះ ជាយូរអង្វែងឆ្នាំ
ហើយ មិនកំណត់ថាប៉ុណ្ណេះប៉ុណ្ណោះឆ្នាំពុំបាន ប៉ុន្តែមនុស្សជាន់ចាស់ៗ

បានចាំតៗមកដល់ឥឡូវនេះស្ទើរតែកល់គ្នា ។

សព្វថ្ងៃនេះចេតិយនោះក៏ទ្រុឌទ្រោមបាក់បែកហើយ លោកគ្រូ សិរីវិសុទ្ធិវង្សាលី វត្តកំពង់ធំ និងលោកចៅហ្វាយស្រុក តើវ លោកមានចិត្តកតញ្ញូរឭកដល់គុណលោកចៅហ្វាយស្រុក គុយ ដោយគិតឃើញជាអ្នកបួសក្នុងព្រះពុទ្ធសាសនា ដែលមានក្នុងដែនកូសាំងស៊ីន ដរាបមកដល់សព្វថ្ងៃនេះ គឺដោយអំណាចលោកចៅហ្វាយស្រុក គុយ នោះឯង ហេតុនោះបានជាសព្វថ្ងៃលោកគ្រូ សិរីវិសុទ្ធិវង្សា លី និងលោកចៅហ្វាយស្រុក តើវ លោកកំពុងអង្គាសយោសនាអស់បណ្តាជនជាតិខ្មែរក្នុងស្រុកនោះ ឲ្យចូលប្រាក់តាមសទ្ធានឹងបានកសាងចេតិយនោះជាថ្មីឡើងវិញ ។

ខ្ញុំបានស្តាប់រឿងនេះហើយ ក៏មានសេចក្តីស្ញើចក្នុងចិត្តគិតថារឿងនេះអស្ចារ្យពេក ក្នុងជាន់នោះមានអ្នកដែលជឿកាន់ព្រះពុទ្ធសាសនាមាំមួន អាចហ៊ានថ្វាយជីវិតរបស់ខ្លួននឹងពុទ្ធសាសនាដូចសេចក្តីខាងលើ ឯសព្វថ្ងៃនេះ ដូចជារកអ្នកណាមួយឲ្យមានសទ្ធាចិត្តជឿស្រឡាញ់ពុទ្ធសាសនាដូច្នោះ មិនមានឡើយ ។

ក្នុងខែត្រត្រាវិញនេះ យើងខ្ញុំបានឃើញវត្តលោកសង្ឃខ្មែរ ដែលល្អៗជាច្រើនវត្ត ចំណែកខាងលោកសង្ឃ ក៏ឃើញមានសេចក្តីចម្រើនក្នុងការរៀនសូត្របាន ៧.៨ វត្តដែរហើយ ចំណែកខាងឃរាវាសជាតិខ្មែរ

មកកាន់ព្រះពុទ្ធសាសនា ឃើញថាជាទាយកអ្នកមានសទ្ធាធ្វើទានដោយច្រើននាក់ ប៉ុន្តែចំណែកខាងឧបាសក ឧបាសិកាអ្នករក្សាសីលមិនសូវមានច្រើន ៗ ក្នុងខេត្តត្រាវិញនេះ ច្រើនពួកមនុស្សជាតិខ្មែរនិយាយប្រាប់ថា សព្វថ្ងៃនេះលំបាកណាស់ព្រោះអ្នកធ្វើរាជការសុទ្ធតែជាតិយួន ច្រើនតែបៀតបៀនពួកខ្មែរឲ្យបានសេចក្តីលំបាក បើពួកខ្មែរមានការអ្វីៗ លុះតែបង់ប្រាក់ទើបសម្រេចបាន ម្ល៉ោះហើយជាតិខ្មែរក្នុងស្រុកនេះ ចេះតែធ្លាក់ចុះទៅជាអ្នកក្រខ្សត់បន្តិចម្តង ៗ ។

ម្យ៉ាងទៀត យើងបានសង្កេតមើលអស់ទាំងបណ្តាជនជាតិ ខ្មែរក្នុងខេត្តត្រាវិញនេះ សុទ្ធតែចេះនិយាយភាសាយួនគ្រប់គ្នា ហើយមានសម្លៀកបំពាក់ ប្រឡំគ្នានឹងជាតិយួនពាក់កណ្តាល ទាំងសម្តីដែលនិយាយជាភាសាខ្មែរ ក៏មិនច្បាស់លាស់ ច្រើនព្រលាំ ៗ ហើយសម្តីនោះច្រើនលាយប្រឡំគ្នានឹងភាសាយួនខ្លះ ។

## ដំណើរចេញពីខេត្តត្រាវិញ ថ្ងៃ ២២ ខែយ៉ាំងវីយេ ឆ្នាំ ១៩២៨

វេលាម៉ោង ៩ ព្រឹក ចេញពីខេត្តត្រាវិញ ចំពោះទៅខេត្តបាក់លីវ (ខ្មែរហៅប៉ោលោរ) ដោយរថយន្តដែល បានទៅដល់ខេត្តកងថឺ នៅវេលាម៉ោង ១២ ថ្ងៃត្រង់ បានឈប់នៅទីខេត្តនោះអស់ ១ ម៉ោងកន្លះ ទើបចេញពីខេត្តកងថឺទៅទៀត បានដល់ទៅខេត្តសុកត្រាំង នៅវេលារសៀលម៉ោង ៣ បានឈប់កន្លះម៉ោង ទើបចេញពីខេត្តសុកត្រាំងទៅទៀត បាន

ទៅដល់ខេត្តបាក់លីវ នៅវេលារសៀលម៉ោង ៤ កន្លះ ចម្ងាយផ្លូវពីខេត្តត្រាវិញដល់ខេត្តបាក់លីវចំនួន ២២០ គីឡូម៉ែត្រ ។ ចាងហ្វាងព្រះរាជបណ្ណាល័យ ចូលទៅឈប់សំណាក់នៅផ្ទះបគ្គោល ខ្លួនខ្ញុំទីងឈ្មោះដី ទៅឈប់សំណាក់នៅវត្តប៉ោលាវ ក្នុងឃុំហឹងហោយ ស្រុកចឹនកាំ ចម្ងាយពីប៉ុស្តិ៍ទៅ ៣ គីឡូម៉ែត្រ ។ វត្តប៉ោលាវនេះ ក៏ជាវត្តធំហើយស្អាតបាតល្អគ្រាន់បើដែរ លោកអធិការវត្តនេះ ក៏មានព្រះទ័យល្អ បានចាត់ចែងទីកាសនៈឲ្យនៅអាស្រ័យអស់ពីរយប់ ព្រមទាំងភោជនាហារ របស់លោកដរាបដល់ចេញពីវត្តនោះមកវិញ ខ្ញុំមានអំណរគុណលោក ដោយក្រៃលែង ។

## ដំណើរក្នុងខេត្តប៉ោលាវ ថ្ងៃ ២៣ ខែយ៉ាំងវីយេរ ឆ្នាំ ១៩២៨

វេលាម៉ោង ៧ ព្រឹក ចាងហ្វាងព្រះរាជបណ្ណាល័យបានអញ្ជើញទៅវត្តប៉ោលាវ ដែលជាវត្តខ្ញុំសំណាក់នៅមួយអន្លើទីងសេក្រេទែរ (ថី) ខ្មែរ ១ នាក់ឈ្មោះសរ ដែលលោកឡ្យុតាំមិចិស្រ្តាធ័រនៅបាក់លីវ ផ្ញើផ្ដាក់ឲ្យជាអ្នកជូនដំណើរ កាលដែលទៅដល់បានអញ្ជើញឡើងទៅលើកុដិលោកអធិការនាមសុខ ព្រោះលោករៀបទទួលនៅកុដិនោះ មិនបាននៅៗកុដិនោះយូរឡើយ ក៏ចុះទៅមើលឯទីវិហារ ព្រោះលោកសង្ឃក្នុងវត្តនោះមិនទាន់មកជួបជុំ ទាំងលោកអធិការ អ៊ិម វត្តខ្វងបបែលក្នុងឃុំស្រុកជាមួយគ្នា ដែលត្រូវនិមន្តមកជួបជុំនៅវត្តក៏មិនទាន់និមន្តមកដល់

លុះចាងហ្វាងព្រះរាជបណ្ណាល័យមើលទីវិហារស្រេចហើយ ត្រឡប់ចុះមកឯកុដិលោកអធិការវិញ ក្នុងវេលាដែលជួបជុំនោះ ចាងហ្វាងព្រះរាជបណ្ណាល័យបានសួរទំនងជួបសួរគ្រប់វត្តឯទៀតក្នុងខេត្តត្រាវិញ រួចបានប្រគេនសៀវភៅនឹងរូបផ្តិតពុម្ព ដល់លោកអធិការវត្តបោ៉លាវនិងវត្តខ្វែងបវែល លុះរួចកិច្ចនេះហើយ ឃើញថានៅសល់ពេលតិចនឹងចេញទៅវត្តឯណាទៀត នឹងត្រឡប់មកវិញមិនទាន់ ទើបចេញទៅមើលមាត់សមុទ្រនៅខាងត្បូងបុស្តិ៍មានផ្លូវល្អរថយន្តទៅបានដល់ លុះទៅដល់ក៏ឃើញសមុទ្រល្ហល្ហេវគួរឲ្យចង់មើលណាស់ ព្រោះសមុទ្រត្រង់នេះមិនមានកោះបាំង នៅមាត់សមុទ្រនោះគេរៀបចំស្អាតគ្រាន់បើ មានតាំងផ្ទះសម្រាប់សំណាក់ ១ តែមិនល្អស្អាតដូចមាត់សមុទ្រខាងកែបនៅក្នុងស្រុកខ្មែរ ។ យើងបានចុះដើរមើលនៅទីមាត់សមុទ្រនោះចំនួន ២០ មីនុតក៏ត្រឡប់មកវិញ លុះត្រឡប់មកតែបន្តិចក៏ឃើញវិហារចិន ១ តូចនៅប្របផ្លូវ គឺចិនគេធ្វើតម្កល់ឆ្អឹងត្រីបាឡែន អ្នកស្រុកនោះគេហៅឆ្អឹងត្រីដរ ទើបនាំគ្នាចុះពីរថយន្តចូលទៅមើលឃើញចិនចាស់ម្នាក់នៅថែរក្សាត្រីនោះ អុជធូបបូជាជានិច្ចឯឆ្អឹងត្រីនោះគេគ្របសំពត់ជាតិជិត ហើយបិទបាំងដោយរាំងននទើបចី សរ សុំឲ្យបើករាំងននទិងសំពត់ជាតិនោះចេញ បង្ហាញចាងហ្វាងព្រះរាជបណ្ណាល័យៗក៏បានថតគំនរឆ្អឹងត្រីនោះរួចត្រឡប់មកវិញ ចាងហ្វាងព្រះរាជបណ្ណាល័យឈប់សំណាក់នៅផ្ទះបង្គលោ

ខ្លួនខ្ញុំទិញឈ្មោះដី ទៅទទួលអាហារកិច្ចនៅផ្ទះបីសរ ៗ លុះដល់សៀលម៉ោង ១ ចេញទៅវត្តដើមអម្ពិល ក្នុងឃុំឃិញកៀក ស្រុកថាញ់ហ៊ឹង តាន់ហ្វាន់ព្រះរាជបណ្ណាល័យបានសួរលោកអធិការវត្តនេះឈ្មោះហ៊ុឆ និងប្រគេនសៀវភៅ ដូចវត្តឯទៀត រួចហួសទៅវត្តពោសលាន វត្តនេះអ្នកខ្លះគេហៅវត្តកណ្ដាល ក្នុងឃុំស្រុកជាមួយគ្នា លោកអធិការវត្តនេះឈ្មោះអ៊ុង មានលោកអាចារ្យ ១ អង្គឈ្មោះហ៊ាឆ កាលដែលទៅដល់វត្តនេះ តាន់ហ្វាន់ព្រះរាជបណ្ណាល័យ បានឡើងទៅមើលវិហាររួចឡើងមកមើលកុដិលោកអាចារ្យហ៊ាឆ ព្រោះគេរៀបចំកន្លែងចាំទទួលនៅកុដិនេះ ហើយបានសួរលោកអធិការ និងបានប្រគេនសៀវភៅនិងរូបផ្ដិតពុម្ពដូចវត្តឯទៀត រួចហើយតាន់ហ្វាន់ព្រះរាជបណ្ណាល័យ បានដើរមើលរបស់ក្នុងកុដិលោកអាចារ្យ ហ៊ាឆ ឃើញមានទូ ៣-៤ មានក្បាំងប្រកបដោយក្បាច់ចម្លាក់ផ្សេងៗគ្នា ជាក្បាច់ល្អដោយយ៉ាង ដល់សួរទៅ បានដឹងថា ក្បាច់ក្បាំងទូទាំងនោះ ជាស្នាដៃរបស់លោកអាចារ្យហ៊ាឆ លោកធ្វើទាំងអស់ តាន់ហ្វាន់ព្រះរាជបណ្ណាល័យក៏សរសើរលោកអាចារ្យហ៊ាឆ ថាចេះការងារល្អ ចំណែកលោកអាចារ្យហ៊ាឆបានដឹងថាតាន់ហ្វាន់ព្រះរាជបណ្ណាល័យ គាប់ចិត្តនឹងក្បាច់ក្បូរទូនោះក៏និយាយនឹងខ្ញុំថា ខ្លួនលោកនឹងគិតធ្វើរបស់អ្វី ១ ឆ្លាក់ឲ្យល្អហើយនឹងយកមកតម្កល់ទុកក្នុងព្រះរាជបណ្ណាល័យ ៗ លុះរួចកិច្ចក្នុងវត្តនេះហើយ ក៏

ចេញចំពោះទៅវត្ត ១ ទៀតឈ្មោះវត្តក្រសាំងក្នុងឡានវិញចូវ (ខ្មែរហៅ ជ្រោយញួរ) ស្រុកថាញ់ហឹង លោកអធិការវត្តនេះនាម ជី ធ្វើជាព្រះឧបជ្ឈាយ៍ផង កាលដែលបានទៅដល់វត្តនេះបានហ្វាក៏ ពួកជួបណ្ណាល័យ បានសួរលោកអធិការ និងប្រគេនសៀវភៅ រូបផ្តិតពុទ្ធ ដូចវត្តឯទៀត រួចត្រឡប់មកឯផ្សារវិញចូវវិញ ហើយតម្រង់ទៅមាត់សមុទ្រតាមផ្លូវ១ផ្សេង ជាផ្លូវល្មមរថយន្តទៅបាន ចំនួនប្រមាណជា ៥-៦ គីឡូម៉ែត្រក៏ដល់ទៅមាត់សមុទ្រ ។ ត្រង់នេះមិនសូវស្អាតល្អទេ ព្រោះគេមិនបានរៀបចំ ក្នុងវេលាដែលទៅដល់នោះ ទទួលក្នុងពេលទឹកជោរផង ខ្យល់ក៏បក់បោកមកពេញសន្ទឹក គួរឲ្យចង់មើលណាស់ ព្រោះមើលទៅៗមិនឃើញមានកោះមានត្រើយឡើយ ក៏បណ្តាលគំនិតឲ្យនឹកឃើញដល់ ធម៌របស់ព្រះសម្មាសម្ពុទ្ធជាម្ចាស់ ដែលទ្រង់ត្រាស់សម្តែងថា សង្សារវដ្តឧបមាដូចជាមហាសមុទ្រ ព្រោះសង្សារវដ្តគឺទីកន្លែង ដែលសត្វស្លាប់កើតកើត មើលខាងដើមខាងចុងមិនឃើញ ដូចជាមហាសមុទ្រ គេមើលត្រើយមិនឃើញដូច្នោះ ។

ម្យ៉ាងទៀត កាលដែលឈរសម្លឹងមើលទៅទឹកក្នុងសមុទ្រដែលកំពុងតែត្រូវខ្យល់បោកបក់រលកគគ្រេងគគ្រាំ មើលទៅៗ ហើយគិតៗទៅ ក៏ឃើញថាគួរខ្លាចគួរស្លុតពេក ប្រសិនបើធ្លាក់លិចលង់ ទៅក្នុងទឹកសមុទ្រដែលកំពុងមានរលកធំៗ ពុះសន្ទឹកគគ្រេងគគ្រាំ ដោយរំលោភ

ខ្យល់បោកបក់ដូច្នេះ សមនឹងកេរ្តិ៍ជាទីពឹងទីផ្អែកទីគោរព ទីដ៏ជួយឲ្យរួចឲ្យផុតពីសេចក្តីស្លាប់មិនមានឡើយ ឃើញថាសមុទ្រនេះជាទីប្រកបដោយសេចក្តីភិតភ័យពេក ដូចជាព្រះពុទ្ធកាបិតសម្តែងថា សង្សារវដ្តនេះដូចគ្នានឹងមហាសមុទ្រ អ្នកណា ១ តែកើតក្នុងសង្សារវដ្តនេះហើយ ក៏មុខជានឹងដល់នូវសេចក្តីភិតភ័យ ជរាដល់ស្លាប់តាំងខ្លួន ដូចគ្នានឹងសត្វដែលធ្លាក់ទៅក្នុងមហាសមុទ្រដូច្នោះឯង ។

កាលដែលទៅមើលមាត់សមុទ្រ ទានវិញបូរនោះ ចំនួនជា ៣០ មីនុតក៏ត្រឡប់មកឯទីសំណាក់ដើមវិញ ។



# មរណានុស្សតិកម្មដ្ឋានពិស្តារ

ព្រះគ្រូវិមលបញ្ញា អ៊ុម ស៊ូរ

អាចារ្យក្នុងព្រះរាជបណ្ណាល័យ កម្ពុជា

ប្រែចេញពីបាលី វិសុទ្ធិមគ្គ

(តបប់)

ឯទីដែលទីងពោលកន្លែងសាកអសុកនោះទៀត ក៏ទីងកំណត់មិនបានដូចគ្នា ដូចបទថា នដេវមិយមាណានំនេហោនបតិតព្វំង អញ្ញត្រ ថាសត្វទាំងឡាយកាលស្លាប់ក្នុងទីនេះ ត្រូវពោលកាយក្នុងទីនេះ មិនគប្បីពោលក្នុងទីឯទៀតៗឡើយ ទីងកំណត់ដូច្នេះមិនបាន ព្រោះថាអត្តភាពរបស់សត្វខ្លះ កាលដែលកើតៗក្នុងស្រុក វេលាដល់ស្លាប់ទៅ ស្លាប់ពោលកាយក្រៅស្រុកក៏មាន ជួនកាលសត្វខ្លះកាលដែលកើតៗក្រៅស្រុក វេលាដល់ស្លាប់ចេញទៅស្លាប់ក្រៅស្រុកក៏មាន ជួនកើតក្រៅស្រុក វេលាដល់ស្លាប់ចូលមកស្លាប់ក្នុងស្រុកក៏មាន សត្វខ្លះកាលដែលនៅៗក្នុងស្រុកនគរនេះ វេលាដល់ស្លាប់ទៅស្លាប់ក្នុងស្រុកឯណោះ នគរឯណោះក៏មាន ជួនកាលដែលនៅៗក្នុងស្រុកឯណោះ នគរឯណោះ វេលាដល់ស្លាប់មកស្លាប់ក្នុងស្រុកនេះនគរនេះក៏មាន សត្វខ្លះកាលដែលនៅៗក្នុងទឹក វេលាដល់ស្លាប់មក ស្លាប់លើគោកក៏មាន

សត្វខ្លះកាលដែលនៅ ៗ លើគោកដល់ស្លាប់ទៅ ស្លាប់ក្នុងទឹកក៏មានដែល នឹងកំណត់ទីស្លាប់ កំណត់មិនបាន ។

ដំណើរដែលនឹងទៅកាន់ភពខាងមុខនោះទៀត ក៏កំណត់មិនបាន ដូចគ្នា ដូចបទថា ឥតោ ចុតេន ឥធ និព្វត្តិតព្វំ ជាសត្វដែលនឹង ច្យុតអំពីទីឯណោះត្រូវមកកើតក្នុងទីនេះស្រុកនេះ នគរនេះកំណត់ដូច្នេះមិន បាន ព្រោះជាសត្វទាំងឡាយដំពូកខ្លះ ច្យុតអំពីទេវលោកមកកើតក្នុង មនុស្សលោកក៏មាន ជួនកាលច្យុតអំពីមនុស្សលោក ហើយទៅកើតក្នុង ទេវលោកខ្លះ ទៅកើតក្នុងរូបភពខ្លះ អរូបភពខ្លះទៅកើតក្នុងតិរច្ឆានកំណើត ខ្លះ ទៅកើតក្នុងប្រេតវិស័យខ្លះ អសុរកាយនិងនរកខ្លះ ប្រព្រឹត្តទៅតាម សមគួរដល់កម្មជាកុសលឬ ជាអកុសលរបស់សត្វ ដែលខំសន្សំក្នុង ជាតិនេះនាំសត្វឲ្យវិលកើតវិលស្លាប់ក្នុងគតិទាំង៥ គឺ, និរយគតិ បេ- តគតិ តិរច្ឆានគតិ មនុស្សគតិ ទេវគតិ មានឧបមាដូច ម្តេចមិញ ជាមានឧបមេយ្យដូចគោដែលបុគ្គលទឹមក្នុងនឹមជាមួយគ្នា តែង ប្រព្រឹត្តទៅតាមកំណត់ និងបៀតផ្លូវមិនអាចនឹងងាកចេញទៅបានឡើយ ឯវំ អនិមិត្តតោ មរណំ អនុស្សរិតព្វំ ព្រះយោគាវចរគប្បីរលឹក ដល់សេចក្តីស្លាប់ ដោយនិមិត្តដូចន័យដែលពោលមកនេះ ។

៧- អទ្ធានបរិច្ឆេទតោ ឲ្យព្រះយោគាវចររលឹកដល់សេចក្តី

ស្លាប់ ដោយអត្តានបរិច្ឆេទ គឺឲ្យពោលថា មនុស្សានំ ជីវិតស្ស នាម ឯតរហិ បរិត្តោ អទ្ធា យោ ចិរំ ជីវតិ សោ វស្សសតំ អប្បំ វា ភិយ្យោ ថាជីវិតនៃមនុស្សទាំងឡាយក្នុងកាលឥឡូវនេះនោះតិចពេកណាស់ ម្យ៉ាងទៀតមនុស្សណាដែលរស់នៅត្រឹម ១០០ ឆ្នាំ ឬ ជាង ១០០ ឆ្នាំ នោះក៏ឃើញថាតិចមនុស្សណាស់ ច្រើនតែមនុស្សដែលមានអាយុតិចថយចុះពី ១០០ ឆ្នាំមក នោះឃើញមានច្រើនមនុស្ស ហេតុដូច្នោះបានជាព្រះសម្មាសម្ពុទ្ធទ្រង់ទេសនាទុកមកថា ៖

អប្បមាយុ មនុស្សានំ ហិនេយ្យ នំ សុបោរិសោ
ចរេយ្យាទិត្តសីសោវ នត្ថិ មច្ចុស្ស នាគមោ ។

សេចក្តីថា ម្នាលភិក្ខុទាំងឡាយ បុគ្គលដែលជាសប្បុរស កាលបើដឹងច្បាស់ថាអាយុនៃមនុស្សនេះតិចយ៉ាងនេះហើយ ក៏គប្បីប្រព្រឹត្តពិនិត្យមើលអាយុនៃខ្លួន កុំស្រវឹងទៅដោយអាយុ កុំចូលចិត្តកាន់យកថាអាយុនោះឋិតនៅយឺនយូរប៉ុន្មាន គប្បីឧស្សាហ៍ព្យាយាមក្នុងសុចរិតធម៌ ខ្វល់ខ្វាយក្នុងគុណធម៌ ដែលនឹងឲ្យសម្រេចដល់ព្រះនិព្វាន ជាទីរម្ងាប់ទុក្ខសោកពេកគ្រប់ចំពូក ត្រូវធ្វើអាការឲ្យបានដូចបុគ្គលដែលមានក្បាលភ្លើងឆេះ ហើយខំខ្វល់ខ្វាយរកឧបាយដើម្បីនឹងលត់ភ្លើងដែលឆេះជាប់នៅលើសីសៈនៃខ្លួន គប្បីឧស្សាហ៍គិតឲ្យសំវេគដល់សេចក្តីស្លាប់ ព្រោះថាកើត

មកជាសត្វ ជាបុគ្គលហើយ ស្តេចមច្ចុរាជមិនមកបៀតបៀននោះមិនមាន ឡើយ ដោយដាច់ខាត ដូចព្រះពុទ្ធភាសិតដែលសម្តែងមកហើយនេះ រួចហើយទើបទ្រង់សម្តែងនូវអរកសូត្រតទៅថា ម្នាលភិក្ខុទាំងឡាយ កាលជាតិអំពីមុននោះតថាគតកើតជាគ្រូម្នាក់ឈ្មោះថា អរកៈបានសម្តែង ធម៌ដល់ព្រាហ្មណ៍ម្នាក់ឈ្មោះ អលង្កតព្រាហ្មណ៍ ក្នុងធម្មទេស- នានោះ មានសេចក្តីថា ជីវិតនៃសត្វទាំងឡាយនេះមិនបានតាំងនៅយូរ ឡើយ ប្រៀបដូចដំណក់នៃទឹកសន្សើម ដែលជាប់នៅដោយចុងស្មៅ ហើយនឹងឆាប់រីងស្ងួតហួតបាត់ទៅដោយកម្តៅព្រះអាទិត្យ ឬ ដូចពពុះទឹក ដែលប៉ោងឡើងដោយកំណាចកម្លាំងនៃខ្សែទឹកផ្ទប់គ្នា ហើយនឹងឆាប់បែក ឆាប់រលាយទៅ ឬ ជាជីវិតនៃសត្វទាំងពួងនេះ នឹងឆាប់រលត់រលាយទៅ ដូចស្នាមគំនូសដែលគេគូសទឹក ហើយឆាប់លប់លាយបាត់ទៅ បើមិន ដូច្នោះ ប្រៀបដូចខ្សែទឹកដែលហូរចុះមកអំពីកំពូលភ្នំ តែងមានខ្សែទឹកដ៏ លឿនឆាប់យកនូវរុក្ខទាំងពួងផងយ៉ាងឆាប់រហ័សទៅ ឬ ដូចទឹកមាត់ដែល បុគ្គលប្រមូលបូលគ្នា ហើយស្តោះចេញទៅនឹងឆាប់ហួតបាត់ទៅ ពុំនោះ សោតដូចដុំសាច់ដែលបុគ្គលដាក់ចុះ ទៅក្នុងខ្ទះដែកដែលក្តៅឆេះឆាប់ឆ្អិនឡើង អស់អន្តរធានទៅយ៉ាងណា ជីវិតនៃសត្វទាំងពួងក៏យ៉ាងនោះឯង គឺឯជីវិត នៃសត្វក្នុងកាលសព្វថ្ងៃនេះតិចពេកណាស់ ច្រើនទៅដោយសេចក្តីទោស

នឹងទុកលំបាក ច្រើនទៅដោយសេចក្ដីសោកសៅអាល័យទាំងពួង បុគ្គលដែលជាបណ្ឌិតជាតិគួរកុំប្រមាទ គប្បីធ្វើការកុសលប្រព្រឹត្តនូវសាសនាព្រហ្មចារិយ៍ ក៏ការដែលកើតមកជាសត្វជាជីវិតហើយដែលនឹងមិនត្រូវស្លាប់នោះ មិនមានឡើយ តែកើតមកហើយក៏គង់មានសេចក្ដីស្លាប់ ក្នុងទីបំផុតមិនខាន ដូចសេចក្ដីដែលទ្រង់សម្ដែងទេសនាទុកក្នុងផលក្កតសូត្រនោះឯង ម្យ៉ាងទៀតព្រះអង្គទ្រង់សម្ដែងថា ៖

យោ ចាយំ ភិក្ខវេ ភិក្ខុ ឯវំ មរណស្សតឹ ភាវេតិ អ-
ហោវតាហំ រត្តិន្ទិវំ ជីវេយ្យំ កតវតោ សាសនំ មនសិក
រេយ្យំ ពហុំ មេកតំ អស្ស ។

ម្នាលភិក្ខុទាំងឡាយ ភិក្ខុក្នុងព្រះពុទ្ធសាសនាដែលមានសទ្ធាចម្រើននូវមរណានុស្សតិកម្មដ្ឋាននោះអង្គណា១ នឹងធ្វើមនសិការៈថា ឱហ្ន ដូចជាយើងគិតទៅអាត្មានេះ បើជាយើងរស់នៅអស់ថ្ងៃនេះនិងយប់នេះ អាត្មាក៏នឹងធ្វើមនសិការៈតាមពាក្យប្រៀនប្រដៅរបស់ព្រះ មានព្រះភាគ គឺខ្លួនអាត្មាត្រូវធ្វើច្រើនឡើងដោយពិត ព្រោះថាជាហេតុនឹងនាំមកនូវបដិវេធធម៌គឺ អរិយមគ្គ អរិយផល អាត្មានឹងប្រព្រឹត្តធ្វើនូវបព្វជិតកិច្ចជាប្រយោជន៍របស់ខ្លួននោះឲ្យច្រើន នៅក្នុងខន្ធសន្តានដរាបដល់កំណត់ជីវិតដែលអាត្មាប្រព្រឹត្តក្នុងថ្ងៃ ១ យប់ ១ នោះ ម្នាលភិក្ខុទាំងឡាយ ភិក្ខុណា១ មានមរណស្សតិ គឺរឮកឃើញសេចក្ដីស្លាប់មានកំណត់ជីវិតត្រឹមថ្ងៃ ១

យប់ ១ ដោយប្រការដូច្នេះ តថាគតហៅភិក្ខុនោះថា ជាអ្នកចម្រើនមរណស្សតិយ៉ាងទន់នៅឡើយ នៅប្រកបដោយសេចក្ដីប្រមាទ និងភិក្ខុដែលមានមរណស្សតិ មានកំណត់ជីវិតអំពីពេលព្រឹកដរាបទៅដល់ពេលល្ងាចនោះក្ដី ឬភិក្ខុដែលរឭកឃើញសេចក្ដីស្លាប់ មានកំណត់ជីវិតពីត្រឹមពេលឆាន់ចង្ហាន់បាន ១ ពំនូតនោះក្ដី ភិក្ខុទាំងឡាយនេះតថាគតថាភិក្ខុនៅប្រកបដោយសេចក្ដីធ្វេសប្រហែសនៅឡើយ ព្រោះចម្រើនមរណានុស្សតិដើម្បីឲ្យអស់នូវអាសវៈនោះនៅទន់ណាស់ មរណានុស្សតិនោះមិនបានក្លាហាន បើភិក្ខុណា ១ ចម្រើនមរណានុស្សតិ គឺរឭកឃើញសេចក្ដីស្លាប់គ្រប់ពំនូតបាយ ឬគ្រប់ដង្ហើមចេញនិងដង្ហើមចូល ដោយគិតថាអាត្មាអញនឹងមានជីវិតរស់នៅត្រឹមពេលដែលលេបពំនូតបាយចូលទៅនេះ ឬ នឹងគិតថាអញនឹងរស់នៅត្រឹមដង្ហើមចេញចូលម្ដងនេះ អាត្មានឹងធ្វើមនសិការៈតាមពាក្យប្រៀនប្រដៅរបស់ព្រះសម្មាសម្ពុទ្ធ នឹងធ្វើបព្វជិតកិច្ចឲ្យជាប្រយោជន៍ដល់ខ្លួនឲ្យច្រើននៅក្នុងសន្ដានខ្លួន ម្នាលភិក្ខុទាំងឡាយ ភិក្ខុដែលឃើញសេចក្ដីស្លាប់គ្រប់ ៗ ពំនូតបាយ ឬ គ្រប់ ៗ ដង្ហើមចេញចូលយ៉ាងនេះ តថាគតសរសើរថាជាអ្នកមានមរណស្សតិក្លាហាន ថាជាអ្នកប្រកបដោយអប្បមាទធម៌ដ៏បរិបូណ៌ នឹងបានអស់ទៅនៃអាសវធម៌ ឯអាការដែលនឹងប្រព្រឹត្តទៅនៃជីវិតនេះតិចតួចពេកណាស់ ដែលនឹងស្និទ្ធស្នាលដោយជីវិត

របស់ខ្លួនថា ជីវិតនេះនឹងឋិតនៅយឺនយូរ អាត្មាមុខជាមិនទាន់ដល់នូវមរណភាពនៅឡើយ នឹងស្មិទ្ធិស្មាលទុកយ៉ាងនេះមិនបានឡើយ អ្នកប្រាជ្ញគប្បី សន្និដ្ឋានចូលចិត្តតាមន័យពុទ្ធភាសិត ដូចពណ៌នាមកនេះ ឯវំ អទ្ធានបរិច្ឆេទតោ មរណំ អនុស្សរិតព្វំ ព្រះយោគាវចរគប្បីរំលឹកដល់សេចក្ដីស្លាប់ ដោយអទ្ធានបរិច្ឆេទតាមន័យដែលពោលមកនេះ ។

៨- ខណបរិត្តតោ ឲ្យព្រះយោគាវចររំលឹកដល់សេចក្ដីស្លាប់ដោយខណបរិត្ត គឺឲ្យរំលឹកថា អតិបរិត្តោ សត្តានំ ជីវិតក្ខណោ ឯកចិត្តប្បវត្តិមត្តោយេវ ជាជីវិតក្ខណៈនៃសត្វទាំងឡាយនេះតិចពេកណាស់ ប្រព្រឹត្តទៅបានមាត្រាជាតែត្រឹមខណៈចិត្ត ១១ ប៉ុណ្ណោះដែលមានព្រះពុទ្ធភាសិត សម្ដែងដោយន័យមានដើមថា ជីវិតសត្វស្ថិតនៅយូរបាន ១០០ ឆ្នាំនោះ គឺថាដោយអំណាចជីវិតិន្ទ្រិយដែលប្រព្រឹត្តទៅដោយលំដាប់តៗគ្នាដោយសន្តតិវោហារហៅថាស្លាប់ បើថាដោយបរមត្ថនោះថាជីវិតសត្វប្រព្រឹត្តទៅដល់ត្រឹមកន្លខណៈនៃចិត្តណា ក៏បានឈ្មោះថាមរណត្រង់នោះ បើជីវិតនោះកើតឡើងជាឧប្បាទខណៈ តាំងនៅជាឋិតិខណៈឈ្មោះថាជីវិតរស់នៅ ឯខណចិត្តនេះមាន ៣ គឺ ឧប្បាទខណៈ ១ ឋិតិខណៈ ១ ភង្គខណៈ ១ កាលដែលជីវិតនេះប្រព្រឹត្តទៅដល់

ត្រឹម ឧប្បាទខណៈ ឋិតិខណៈ ឈ្មោះថារស់នៅ បើដល់ទៅ ភង្គខណៈ ហើយឈ្មោះថាដាច់ទៅ កាលបើជីវិតដាច់ហើយចិត្តក៏រលត់ៗ ហើយ ក៏បានឈ្មោះថាសត្វស្លាប់ក្នុងគ្រានោះឯង តែថាមរណៈក្នុងភង្គខណៈនោះ ផុតវិស័យសត្វទាំងពួងនឹងដឹងបានព្រោះថាខណៈនៃចិត្តដែលប្រព្រឹត្តទៅក្នុងសន្តានយើងរាល់គ្នាទាំងពួងនេះឆាប់រហ័សណាស់ នឹងយកវត្ថុឯណាមកឧបមាប្រៀបនោះ បានដោយកម្រពេកណាស់ ដូចព្រះពុទ្ធភាសិតត្រាស់ថា ៗ

នាហំ ភិក្ខវេ អញ្ញំ ឯកធម្មម្បិ បស្សាមិ ឯវំលហុ-
បរិវត្តំ យថាយិទំ ភិក្ខវេ ចិត្តំ ៗ

ម្នាលភិក្ខុទាំងឡាយ ចិត្តនេះមានភាវៈប្រព្រឹត្តរហ័សក្រៃពេកណាស់ រកធម្មជាតិដទៃ ៗ នឹងឲ្យប្រព្រឹត្តរហ័សស្មើដោយចិត្តនេះ តថាគតពិចារ-ណារកមើលមិនឃើញ មានសូម្បីដល់ ១ ឡើយ ម្នាលភិក្ខុទាំងឡាយ នាយខ្មាន់ធ្នូ ៤ នាក់បានហាត់ហ្វឹកហ្វឺនស្ទាត់ជាយ៉ាងល្អក្នុងសិល្បសាស្រ្តធ្នូ ក្នុងពេល ១ នោះ ខ្មាន់ធ្នូទាំង ៤ នាក់ក៏ចេញទៅឈរនៅក្នុងទិសទាំង ៤ ហើយក៏យកព្រួញផ្គងដាក់ផ្គាប់នឹងចន្ទោះធ្នូ ហើយបាញ់ចេញទៅព្រមគ្នាគ្រប់ទិសទាំង ៤ ព្រួញក៏លឿនទៅក្នុងទិសទាំង ៤ ដោយកម្លាំងឆាប់រហ័សតាមកម្លាំងព្រួញ ហើយដែលមានបុរសដែលមានកម្លាំងឆាប់រហ័សជាង

ខ្យល់បក់ ក៏រត់លឿនទៅក្នុងទិសខាងកើត ចាប់យកព្រួញដែលនៅក្នុងទិស ខាងកើតនោះបានហើយ ត្រឡប់មកទិសខាងលិចហើយ ចាប់យកព្រួញ ដែលមកក្នុងទិសនោះបានទៀត ហើយរត់ទៅក្នុងទិសខាងជើងខាងត្បូង ក៏ចាប់យកព្រួញដែលទៅក្នុងទិសនោះ ៗ បានទាំងអស់មិនទាន់ធ្លាក់ដល់ដី ឡើយ ក៏កម្លាំងបុរសដែលឆាប់រហ័សជាងខ្យល់យ៉ាងនេះ និងយកមក ប្រៀបនឹងកម្លាំងសន្ទុះនៃចិត្តនេះ ក៏ប្រៀបមិនបាន ម្យ៉ាងទៀតកម្លាំង លឿនទៅនៃចន្ទមណ្ឌល ឬសុរិយមណ្ឌលក្តី ឬកម្លាំងសន្ទុះនៃទេវតា ដែលលឿនទៅខាងមុខ នៃចន្ទមណ្ឌលនិងសុរិយមណ្ឌលនេះក្តី ក៏យក មកប្រៀបដោយសន្ទុះនៃចិត្តនេះក៏ប្រៀបមិនបានឡើយ ម្នាលភិក្ខុទាំង ឡាយ ឯកិរិយាឆាប់រហ័សនៃចិត្តនេះ និងរកវត្ថុអ្វីមួយមកឧបមា ឧបមេយ្យនោះមិនងាយនឹងរកបានឡើយ អ្នកប្រាជ្ញគប្បីសន្និដ្ឋានថា ចិត្ត ដែលប្រព្រឹត្តទៅក្នុងសន្តានកើតហើយរលត់ ៗ ហើយកើតជាខណៈៗ គ្នា នោះ និងបានជាប់ជាបន្ទោះ ៗ គ្នានោះក៏ទេ គឺជាប់គ្នាមិនដាច់ ប្រៀប ដូចខ្សែទឹកហូរដូច្នោះឯង ចិត្តឡើងកាន់វិថីហើយចុះទៅកាន់ភវង្គ ចុះទៅ កាន់ភវង្គហើយឡើងមកកាន់វិថីទៀត ចិត្តនេះរលត់ចិត្តនោះកើត ចិត្ត នោះកើតចិត្តនេះរលត់ជាលំដាប់ ៗ គ្នាទៅ ប្រៀបដូចកង់រថដែលវិលទៅ នោះឯង ។

អ្នកប្រាជ្ញ គប្បីសន្និដ្ឋានថាជីវិតនៃសត្វនេះ កាលបើពោលដោយ

បរមត្ថនោះ មានកំណត់តែត្រឹមខណចិត្តតែ ១ រលត់ទៅកាលបើចិត្តនោះរលត់ចុះហើយ សត្វក៏ឈ្មោះថាស្លាប់ក្នុងគ្រានោះ បើចិត្តនោះរលត់ ១ ខណៈ ឬ ២ ខណៈ ៣ ខណៈសត្វក៏ឈ្មោះថាស្លាប់ម្តង ឬ ២ ដង ៣ ដង បើចិត្តនោះរលត់ ១ រយ ១ ពាន់ខណ ក៏បានឈ្មោះថាសត្វស្លាប់ ១ រយ ១ ពាន់ដង ចិត្តដែលរលត់នោះតាប់ខណៈមិនបានយ៉ាងណា សេចក្តីស្លាប់របស់សត្វក៏តាប់មិនបានយ៉ាងនោះ ស្លាប់គ្រប់ ៗ ខណចិត្តនោះ ដូចបញ្ហាដែលព្រះសម្មាសម្ពុទ្ធទេសនាទុកក្នុងអភិធម្មថា ៗ

អតីតេ ចិត្តក្ខណេ ជីវិត្ថ ន ជីវតិ ន ជីវិស្សតិ អនាគតេ ចិត្តក្ខណេ ន ជីវិត្ថ ន ជីវតិ ជីវិស្សតិ បច្ចុប្បន្នេ ចិត្តក្ខណេ ន ជីវិត្ថ ជីវតិ ន ជីវិស្សតិ

សេចក្តីថា សត្វដែលមានជីវិតក្នុងខណចិត្តដែលជាអតីតនោះមិនមានជីវិតក្នុងខណចិត្តជាបច្ចុប្បន្ន មិនមានជីវិតក្នុងខណចិត្តជាអនាគត សត្វដែលមានជីវិតក្នុងខណចិត្តជាអនាគតនោះ មិនមានជីវិតក្នុងខណៈ-ចិត្តជាអតីត មិនមានជីវិតក្នុងបច្ចុប្បន្ន សត្វដែលមានជីវិតក្នុងខណចិត្តជាបច្ចុប្បន្ននោះ មិនមានជីវិតក្នុងខណចិត្តជាអតីត មិនមានជីវិតក្នុងខណចិត្តជាអនាគត បញ្ហានេះ ព្រះសម្មាសម្ពុទ្ធទ្រង់ទេសនាទុកដើម្បីនឹងឲ្យដឹងឃើញអធិប្បាយក្នុងបរមត្ថថា សត្វដែលមានជីវិតនៅក្នុងកាលទាំង

៣ គឺ អតីត អនាគត បច្ចុប្បន្ន នោះក្នុងកាល ១ ៗ មានខណៈ ៣ ៗ គឺ ឧប្បាទខណៈ ១ ឋិតិខណៈ ១ ភង្គខណៈ ១ មានខណៈចិត្តដូច្នេះ ដូចគ្នាទាំងអស់គ្រប់ខណចិត្ត មិនបានប្លែកគ្នាក៏ទេ ៗ

ឯខណចិត្ត ១ ៗ នោះ មាននាមនិងរូបជាសហជាតកើតព្រមគ្នាជាផ្នែក ៗ យ៉ាងនេះ ដូចគាថាដែលព្រះសម្មាសម្ពុទ្ធសម្តែងទុកថា ៗ

ជីវិតំ អត្តភាវោ ច សុខទុក្ខា ច កេវលា ឯកចិត្តសមាយុត្តា លហុសោ វត្តតេ ខណោ យេ និរុទ្ធា មរន្តស្ស តិដ្ឋមានស្ស វា ឥធ សព្វេបិ សទិសា ខន្ធា គតា អប្បដិសន្ធិយា ៗ

អធិប្បាយក្នុងគាថាដើមថា សហជាតធម៌គឺជីវិតនិងអត្តភាព និងសុខ និងទុក្ខ និងសហជាតធម៌ដ៏សេសពាកសុខ និងទុក្ខ និងជីវិតិន្ទ្រិយ នោះតែងសម្បយុត្តគ្រប់ ៗ ខណចិត្តក្នុងចិត្ត ១ ៗ ដូចគ្នាទាំងអស់ឯសហជាតធម៌ទាំងឡាយនេះមិនបានលាយប្រឡំគ្នាក៏ទេ កើតព្រមគ្នាដោយខណចិត្តណា ក៏ជាផ្នែកញែកគ្នាទៅតាមខណចិត្តនោះ ៗ

ឯខណដែលមិនកើតឡើងនៃសហជាតធម៌ គឺសុខនិងទុក្ខនិងជីវិតិន្ទ្រិយជាដើមនោះ ក៏ប្រព្រឹត្តទៅឆាប់រហ័សព្រមគ្នា ១ អន្ទើដោយខណចិត្ត យេ និរុទ្ធា មរន្តស្ស តិដ្ឋមានស្ស វា ជាខន្ធនៃ

បុគ្គលដែលស្លាប់ នឹងដល់នូវកិរិយារលត់ព្រមដោយចុតិចិត្តក្តី និងខន្ធនៃបុគ្គលដែលស្ថិតនៅមិនទាន់ស្លាប់ នឹងដល់នូវកិរិយារលត់ក្នុងភង្គខណៈក្រៅពីចុតិចិត្តក្តី នឹងបានបែកគ្នានោះក៏ទេ សព្វេបិ សង្ខារា ខន្ធា គតា អប្បដិសន្ធិយា ថាខន្ធទាំងឡាយទាំងពួងប្រាកដជារលត់ដូចគ្នាស្មើគ្នាទាំងអស់ តែថាខន្ធដែលរលត់ព្រមដោយចុតិចិត្តនោះ មានបដិសន្ធិចិត្តកើតជាលំដាប់ គឺបដិសន្ធិចិត្តដែលកាន់យកអារម្មណ៍នៃជវនក្នុងមរណាសន្នវិថី មានកម្មឬកម្មនិមិត្ត ឬគតិនិមិត្តជាអារម្មណ៍នោះ កើតក្នុងលំដាប់នៃចុតិចិត្ត ចំណែកខាងខន្ធដែលរលត់ខាងភង្គខណចិត្តទាំងពួងក្រៅពីចុតិចិត្តនោះ នឹងបានមានបដិសន្ធិចិត្តនោះកើតជាលំដាប់ក៏ទេ មានតែចិត្តដទៃក្រៅពីបដិសន្ធិចិត្តនោះ កើតជាលំដាប់ តាមគួរដល់អារម្មណ៍ដែលប្រព្រឹត្តក្នុងសន្តាន អ្នកប្រាជ្ញគប្បីសន្និដ្ឋានថា ក្នុងមរណាសន្នវិថីគឺផ្លូវជិតនឹងដល់មរណៈនោះកាលនៅ ១៧ ខណចិត្តទៀតនឹងដល់ចុតិចិត្តហើយ ខាងក្រោយចុតិចិត្តនោះ ១៧ ខណចិត្ត នឹងបានមានកម្មជរូបកើតឡើងផងក៏ទេ ឯកម្មជរូបដែលកើតហើយអំពីមុននោះ ក៏រលត់ចុះព្រមគ្នាដោយចុតិចិត្ត កាលបើកម្មជរូបរលត់ហើយ លំដាប់នោះចិត្តជរូបនឹងអាហារជរូបនោះក៏រលត់ទៅតាមគ្នា នៅសល់តែឧតុជរូបប្រព្រឹត្តទៅក្នុង កាឡេវរសាកអសុភ ដរាបដល់បែកធ្លាយសាបសូន្យទៅ

យ៉ាងនេះឯងជាខណ្ឌដែលរលត់ទៅព្រមដោយចុតិចិត្ត ចំណែកខណ្ឌដែលរលត់ទៅក្នុងកង្គខណ ទាំងពួងចាកចុតិនោះរូបកលាបនៅកើតត ៗ មិនដាច់គ្នាប្រៀបដូចជាអណ្តាតប្រទីប ឬខ្សែទឹកដែលប្រព្រឹត្តទៅមិនដាច់ចាកគ្នានោះឯង រូបដែលកើតឡើងមុន ៗ នោះ មានអាយុគ្រប់ ១៧ ខណចិត្តហើយក៏រលត់ទៅរូបដែលមានអាយុមិនទាន់គ្រប់កំណត់នោះ ក៏នៅប្រ-ព្រឹត្តទៅក្នុងសន្តាន កើតជាសង្កាត់ ៗ គ្នាតទៅ រូបកលាបទាំងពួងមិនដាច់ចាកសន្តាន អ្នកប្រាជ្ញគប្បីសន្និដ្ឋានថា បើទុកជារូបកលាបកើតប្រ-ដិតជាប់នៅក្តី តែខណចិត្តរលត់ចុះហើយ ក៏ចាត់ជាឈ្មោះថា ដល់នូវមរណៈពិតៗ

ឃរិខណាបរិត្តតោមរណាំអនុស្សតិពុំ ព្រះយោគាវចរគប្បីរឭកដល់សេចក្តីស្លាប់ ដោយខណបរិត្ត ដោយន័យដែលព្រះពុទ្ធភា-សិត ត្រាស់ទេសនាដូចពណនាមកនេះជំនុំអាការទាំងឡាយ ៨ ប្រការដូចន័យដែលសម្តែងមកហើយនេះ បើព្រះយោគាវចរបានរឭកតែន័យណា ១ បានធ្វើទុកក្នុងចិត្តរឿយ ៗ ចិត្តដែលមានមរណានុស្សតិកម្មដ្ឋានជាអា-រម្មណ៍នោះ ក៏នឹងបានសេពដោយការនាក្លាហាន ក្នុងការចម្រើនស្មារតីដែលមានមរណជាអារម្មណ៍នោះ ក៏នឹងតាំងនៅជាយ៉ាងល្អ ទិងឃាត់នូវនីវរណធម៌ទាំងពួងបាន អង្គឈានក៏នឹងកើតប្រាកដ តែថាមិនបានដល់

អប្បនា ឈាន បានតែត្រឹមឧបចារឈាន ព្រោះថាមរណារម្មណ៍ នោះជាសភាវធម៌ជាវត្ថុគួរឲ្យកើតសំវេគពេកណាស់ កាលបើកាន់យកនូវមរណស្សតិជាអារម្មណ៍ហើយរឭករឿយៗ នោះតែងនាំមកនូវសេចក្ដីតក់ស្លុតចិត្តទៅក្នុងខាងមុខ ហេតុដូច្នោះភាវនាចិត្តដែលប្រកបដោយមរណ-ស្សតិនោះមិនអាចបានដល់ អប្បនា ឈាន បានត្រឹម ឧបចារ-ឈាន ។

មានពាក្យបុច្ឆាជៀតចូលមកថា ចុះលោកុត្តរឈាន និង ទុតិយារូបឈាន ចតុត្ថារូបឈាន មានអារម្មណ៍ជាសភាវធម៌ដែរ ឬក៏បានជាឡើងហូតទៅ អប្បនា ឈាន បាន ។

ពាក្យទទួលតបវិញថា លោកុត្តរឈាន ដែលឡើងទៅដល់ អប្បនាឈាន បាននោះ ដោយអំណាចភាវនាវិសេស គឺចម្រើនវិសុទ្ធិភាវនាឡើងទៅដោយលំដាប់ ៗ អារម្មណ៍ក៏ជាសភាវធម៌ពិត តែបានអានុភាពដែលចម្រើនវិសុទ្ធិភាវនានោះឲ្យផល ទើបអាចឡើងហូតទៅដល់អប្បនាឈានបាន ។

ឯទុតិយារូបឈាន និង ចតុត្ថារូបឈាន មានអារម្មណ៍ជាសភាវធម៌បានឡើងទៅដល់ អប្បនាឈាននោះ ដោយអំណាចអារម្មណ៍ជាសមតិក្កមភាវនាគឺទុតិយារូបនោះកន្លងបង់ នូវអារម្មណ៍នៃបឋ-

មាររូបបត្តភារូបនោះកន្លងបង់នូវអារម្មណ៍នៃតតិយារូប ហេតុដូច្នេះ បើទុក ជាអារម្មណ៍នោះ ជាសភាវធម៌ក្តី ក៏គង់ដល់នូវអប្បនាឈានបាន ដោយ អារម្មណ៍ជា សមតិក្កមភាវនា ។

ក្នុងមរណានុស្សតិនេះកេរិសុទ្ធិភាវនានឹងអារម្មណ៍សមតិក្កមភាវនា មិនមាន ហេតុដូច្នោះព្រះយោគាវចរ ដែលចម្រើន មរណានុស្សតិនោះ ទើបបានតែត្រឹម ឧបចារឈាន ។

ឯឧបចារឈាន ដែលព្រះយោគាវចរ បានក្នុងទីដែលចម្រើន មរណានុស្សតិនោះ ក៏បានដល់នូវពាក្យហៅថា មរណានុស្សតិ ឧបចារឈាន ព្រោះ ឧបចារឈាន នោះកើតឡើងដោយអំណាច ពិចារណាមរណស្សតិ នោះឯង ។

ឥមំចបន មរណស្សតិមនុយុត្តោ ភិក្ខុ សតតំ អប្បមត្តោ ហោតិ ។

សេចក្តីថា បុគ្គលដែលឃើញភ័យក្នុងវដ្តសង្សារបានចម្រើននូវមរណានុស្សតិនេះ ក៏នឹងអាចលះបង់នូវសេចក្តីប្រមាទរឿយ ៗ ហើយមិនបាន ត្រេកអរក្នុងភពទាំងពួង នឹងលះបង់នូវសេចក្តីត្រេកអរក្នុងជីវិត នឹង ជាអ្នក និន្ទាតិះដៀលនូវការជាលាមក នឹង មិនសន្សំទុកនូវបច្ច័យ នឹង ប្រាស ចាកសេចក្តីកំណាញ់ក្នុងគ្រឿងបរិក្ខារទាំងពួង ហើយនឹងដល់នូវសេចក្តី

សន្សំក្នុងអនិច្ចសញ្ញា គឺបានឃើញនូវសេចក្ដីមិនទៀងក្នុងរូបធម៌និងនាមធម៌ហើយនឹងបាននូវទុក្ខសញ្ញា អនត្តសញ្ញា ប្រាកដដោយអំណាចរឭកតាមអនិច្ចសញ្ញា បើបានឃើញអនិច្ចសញ្ញាហើយ ក៏ជាគុណឲ្យឃើញដល់ទុក្ខសញ្ញា និងអនត្តសញ្ញា កាលបើបានឃើញព្រះត្រៃលក្ខណញាណប្រាកដច្បាស់ក្នុងខន្ធសន្តានហើយ ដល់វេលានឹងស្លាប់ក៏មិនបានខ្លាចស្លាប់ប៉ុន្មាន និងមានស្មារតីមិនវង្វេងចាកកុសលធម៌ ។

ឯបុគ្គលដែលមិនបានចម្រើន មរណានុស្សតិនោះ គ្រានឹងដល់មរណសម័យគឺកាលជិតនឹងស្លាប់នោះក៏កើតសេចក្ដីតក់ស្លុតខ្លាចស្លាប់នោះក្រៃពេក ប្រៀបដូចបុគ្គលដែលម្រឹគពាលគ្របសង្កត់ទុកជាអាហារ ឬនៅក្នុងកណ្ដាប់ដៃយក្ស ឬនៅក្នុងមាត់ពស់ដែលមានពិស ឬនៅក្នុងកណ្ដាប់ដៃចោរឬពេជ្ឈឃាដដូច្នោះឯង ដែលមានសេចក្ដីតក់ស្លុតយ៉ាងនេះ នោះព្រោះអាស្រ័យហេតុដែលមិនបានចម្រើន មរណានុស្សតិនោះ ។

ឯគុណដែលចម្រើន មរណានុស្សតិនេះ ជាបច្ច័យនឹងឲ្យសម្រេចដល់ព្រះនិព្វាន បើមិនទាន់បានសម្រេចព្រះនិព្វានក្នុងជាតិនេះទេ កាលទម្លាយខន្ធដាច់ជីវិតិន្ទ្រិយ៍ហើយ ក៏គង់មាន សុគតិភព នៅខាងមុខ ។

តស្មា ហវេ អប្បមាទំ កយិរាថ សុមេធសោ

ឃរំ មហា ធុកា ភយ    មរណា ស្សតិ យា សធា

ហេតុដូច្នោះព្រះយោគាវចរដែលមានប្រាជ្ញាល្អ កុំគប្បីធ្វើនូវសេចក្តីប្រមាទ ហើយគប្បីឧស្សាហ៍ចម្រើននូវ មរណានុស្សតិ ភាវនាដែលជាធម៌ប្រកបដោយគុណានុភាពដ៏ធំសព្វ ៗ កាលទៅហោង ។

មរណានុស្សតិកម្មដ្ឋានចប់

